# ខ្មែរប៉ុស្ដិ៍
# The Khmer Post
ISSUE 37 01st- 15th June 2009




## សន្និសីទពិភពលោកលើកទី៣របស់យុវជនខ្មែរក្រោម

●●● នៅ " មជ្ឈមណ្ឌលរដ្ឋធម្មនុញ្ញ "( Constitution Center ) (តទៅទំព័រទី២០)



## ខ្មែរ_លាវ
## ធ្វើបុណ្យរួមគ្នា

**ដោយ : ពិន សំខុន**

●●● ជាការកម្រឃើញ ដែលខ្មែរ-លាវប្រារព្ធធ្វើ បុណ្យរួមគ្នានៅលើបរិវេណផ្លូវលេខ ៧ ហ្វីឡាដែល-ហ្វីយ៉ាខាងត្បូង។ (តទៅទំព័រទី១០)



## ទស្សនៈវិស័យ : ខួប១ឆ្នាំខ្មែរប៉ុស្ដិ៍

**ដោយ : លោក ម៉ម យឹន**

**បុព្វហេតុ :**

●●● សារព័ត៌មានខ្មែរប៉ុស្ដិ៍ ដែលបានចាប់បដិសន្ធិកកើតឡើងមុនដំបូងនៅក្នុងរដ្ឋកាលីហ្វូរនីញ៉ា ដោយអស់លោកអ្នកមួយក្រុមជាបញ្ញាវន្ត សកម្មជន មានគោល បំណង (តទៅទំព័រទី០៨)









# Bridging the Gap

●●●ក្នុងរយៈពេល១ឆ្នាំ នៃដំណើរការ "ខ្មែរប៉ុស្តិ៍ "យើងបានបង្ហាញពីទិដ្ឋភាពជាច្រើន នៃសហគមន៍ខ្មែរ ឬសហគមន៍បរទេសផ្សេង ដើម្បីឱ្យស្គាល់ ហើយចងភ្ជាប់គ្នាជាកម្លាំងបាន សហគមន៍ខ្មែរក៏ត្រូវការកម្លាំង ដូចនេះ ត្រូវចងស្ពានផ្ជាប់វប្បធម៌, សេដ្ឋកិច្ច និងជំនាន់មនុស្ស ខុស១គ្នា ឬអ្នកដទៃជាភាពចាំបាច់ **នារី គីត** នឹងផ្តល់ការពិចារណាដូចខាងក្រោមនេះ :



By: Nary P. Kith

A major problem that exists today is the disconnection between different ethnic and cultural groups. One might make the assumption that the people are disconnected because they are 'different'; they do not share the same ethnicity, culture, or language so they do not understand each other. What about people who share the same ethnicity, culture and language and are still disconnected? What contributes to any two people or any two groups (from the same ethnic background and culture) feeling disconnected? And how can anyone begin to 'bridge the gap' that continues to grow resulting in continued miscommunications, misunderstandings and unhealthy relationships?

For the purpose of this publication and to be more specific, let's use the Cambodian ethnic group and culture as an example to discuss the relational 'gap' that exists today. What are the underlying reasons that cause that gap and what can be done to 'bridge' that gap? One explanation is the generational differences within this group. A Cambodian person born and raised in Cambodia may not have the same ideas about life and relationships as a Cambodian person born and raised in the United States (or to those who were foreign born but raised in the United States).

(Continue to Page 14)

# តម្លៃជីវិត : សកម្មជនសេតវិមាន ស៊ីវ ស៊ីចាន់ : ឆ្អឹងមាស

**Long Beach, ខ្មែរប៉ុស្តិ៍ : មាជ សុវណ្ណារ៉ា**

●●●អតីតឧបការីរបស់ ប្រធានាធិបតីសហរដ្ឋអាមេរិកក្នុងអាណត្តិទី41 លោក ស៊ីវ ស៊ីច័ន្ទ បានបង្ហាញនូវមោទនភាពពីជីវិតរបស់លោកថា គឺជាជនមានសំណាងឆ្អឹងអំណែតដែលងើបផុតពីនរកអវិចីពីក្នុងរណ្តៅទីលានពិឃាតនៃរបបខ្មែរក្រហម ឱ្យរស់រានមានជីវិតជាថ្មី ក្នុងផ្លូវមួយឆ្ពោះទៅរកអនាគតភ្លឺស្វាងនៃមាតុភូមិកំណើតទី2នាទឹកដីអាមេរិក រហូតដល់មានកិត្តិយសការងារជាប់ផ្ទាល់គ្រប់ពេលវេលាជាមួយប្រធា-នាធិបតី ដែលជារឿងមិនធម្មតា និងកម្របំផុតចំពោះជនជាតិអាស៊ី ជាអំបូរពូជសាសន៍ខ្មែរ ដែលជាតំណាងផ្តល់តម្លៃដល់ជនជាតិខ្មែរទាំងមូល ។

ឯកអគ្គរដ្ឋទូត ស៊ីវ ស៊ីច័ន្ទ បានបង្ហាញមោ-ទនភាពបែបនេះនៅក្នុងពិធីប្រគល់សៀវភៅ ដែលនិយាយពីដំណើរជីវិតក្នុងភាពទុក្ខសោកខ្លោចផ្សានៅក្នុងសង្គមកម្ពុជា ដែលគ្របដណ្តប់ទៅដោយថ្លុកឈាម និងទឹកភ្នែកពីពលរដ្ឋខ្មែរទូទាំងនគរដែលបានរស់នៅ ដោយភាពឈឺចាប់បំផុតពីការធ្វើបាបដាក់ទារុណកម្មឱ្យមនុស្សធ្វើការហួសកម្លាំង ហូបចុកមិនគ្រប់គ្រាន់ ក្នុងរាង-កាយស្បែក ដណ្តប់ឆ្អឹងក្រោមរនាំងគុកឥតជញ្ជាំង និងការកាប់សម្លាប់មនុស្សដ៏ឃោរឃៅអស់ជិត 2លាននាក់ នៅក្នុងរបបខ្មែរក្រហមនោះ ។

ដែលសៀវភៅនោះមានឈ្មោះថា "ឆ្អឹងមាស" (Golden Bones) ឱ្យដល់បណ្ណាល័យរដ្ឋក្រុង Long Beach កាលពីថ្ងៃទី 20 ខែឧសភា ឆ្នាំ 2009 ជាថ្ងៃមួយដែលពលរដ្ឋខ្មែរនៅឯប្រទេសកម្ពុជា ប្រារព្ធពិធីគោរពវិញ្ញាណក្ខន្ធដល់បងប្អូន



ខ្មែរ ដែលបានស្លាប់ក្រោមរបប ប៉ុល ពត និងជាថ្ងៃដែលពលរដ្ឋខ្មែរប្រារព្ធធ្វើដើម្បីចងកំហឹងទប់ស្កាត់កុំឱ្យមានរបបខ្មែរក្រហមរស់ឡើងវិញផងដែរ ។

ថ្លែងទៅកាន់ភ្ញៀវដែលបានចូលរួមស្តាប់ពីដំណើរជីវិតរបស់គាត់ជាមួយការផ្សព្វផ្សាយសៀវភៅ "ឆ្អឹងមាស" ដែលធ្វើឡើងនៅក្នុងបណ្ណាល័យ Long Beach´s Main Library អគ្គរដ្ឋទូត ស៊ីវ ស៊ីច័ន្ទ បាននិយាយដល់បណ្តាំម្តាយនូវពាក្យមួយឃ្លាថា "ទោះបីមានហេតុការណ៍អ្វីកើតឡើងយ៉ាងណាក្តីចំពោះកូន កូនមិនត្រូវអស់ក្តីសង្ឃឹមក្នុងផ្លូវជីវិតឡើយ" ដែលនេះជាការចងចាំ និងតាំងចិត្តដើម្បីតស៊ូឱ្យសម្រេចជីវិតដល់គោលដៅក្នុងការប្រឹងប្រែងជំនះគ្រប់ឧបសគ្គចំពោះមុខនៅទីបំផុតមួយខ្ញុំបានសម្រេចជីវិតដោយជោគជ័យជាមួយប្រពន្ធខ្ញុំ ។ បណ្តាំម្តាយខ្ញុំនោះហើយបាននាំឱ្យខ្ញុំជួបជុំ ធ្វើការងារផ្ទាល់ជាមួយប្រធានាធិបតីអាមេរិក ជាអ្នកការទូតអ្នកសេដ្ឋកិច្ច សង្គមពិភពលោក ប្រចាំអង្គ-ការសហប្រជាជាតិ ឧបការីរងប្រធានាធិបតី និងឧបការីរងក្រសួងការបរទេស អាមេរិកប្រចាំតំបន់អាស៊ីប៉ាស៊ីហ្វិក ដែលខ្លួនជាខ្មែររួចចេញផុតពីឋាននរកអវិចីក្នុង របបវាលពិឃាតខ្មែរក្រហមនៅប្រទេសកម្ពុជា ឱ្យក្លាយជាពលរដ្ឋអាមេរិកម្នាក់ដែលកើតចេញពីជីវិតជាកម្មករបេះផ្លែប៉ោមមានតែលុយ 2ដុល្លារ បន្សល់ទុកមកពីអតីតជនភៀសខ្លួនខ្មែរនៅស្រុកសៀម រហូតមកដល់សហរដ្ឋអាមេរិក និងជាអ្នករត់តាក់ស៊ីនៅបូរី New York ជាទីកន្លែងដែលលោកឯកអគ្គរដ្ឋទូតបានបញ្ចប់ការសិក្សានូវអនុបណ្ឌិតផ្នែកកិច្ច-ការទូតអន្តរជាតិ ជាចំណងផ្សារភ្ជាប់ចំណេះដឹងគួបផ្សំនឹងវាសនាចារមកឱ្យរូបលោក ស៊ីវ ស៊ីច័ន្ទ បានឈានជើងចូលបំរើកិច្ចការនយោបាយឱ្យជាតិអាមេរិក និងពិភពលោក ដោយធ្វើការផ្ទាល់ជាមួយប្រធានាធិបតី នៅសេតវិមាន (White House) ។

ដោយលោកអះអាងថា "វាជាពេលវេលាដែលមិនចេះចប់ និងជាទូទៅនៃការចង់បាននូវសេចក្តីស្រឡាញ់ ក្តីសុបិន ការសង្ឃឹម និងសេរី-ភាពដែលមនុស្សគ្រប់រូបប្រាថ្នាចង់បាននៅទីបញ្ចប់មួយ" ។

អគ្គរដ្ឋទូត ស៊ីវ ស៊ីច័ន្ទ ក្នុងអារម្មណ៍ និងបេះដូងដែលប្រើខួរក្បាលគិតគូរ និងចូលចិត្តបញ្ហានយោបាយក្នុងកិច្ចការដឹកនាំរបស់ឥស្សរជនអាមេរិក រូបគាត់បានចាប់ចិត្តជាមួយមនុស្សសំខាន់ៗរបស់គណបក្សសាធារណរដ្ឋ រហូតដល់គាត់បានលះបង់ពីពេលវេលា ថវិកាមួយចំនួនចូលខ្លួនទៅបំរើឱ្យគោលនយោបាយអតីតប្រ-ធានាធិបតី George H.W Bush ក្នុងកំឡុងពេលនោះជាអតីតអនុប្រធានាធិបតីក្នុងរដ្ឋការលោក Ronald Reagan ជាប្រធានាធិបតីដោយមិនគិតកម្រៃ (Volunteered) នៅឆ្នាំ 1988 ជាមួយពេលវេលាជួយដល់យុទ្ធនាការឃោសនាបោះឆ្នោតជ្រើសរើសប្រធានាធិបតីអាណត្តិទី4 1 ដែលលោក George H.W Bush ឈរឈ្មោះជាបេក្ខជនប្រធានាធិបតី ដែលនៅទីបញ្ចប់អតីតអនុប្រធានាធិបតីរូបនេះបានក្លាយជាប្រធានា-ធិបតីជាបន្ត3ជំនាន់របស់គណបក្សសាធារណរដ្ឋកាន់កាប់អំណាច3អាណត្តិជាប្រវត្តិសាស្ត្រមួយ

(តទៅទំព័រទី១៥)

# បទសម្ភាសន៍ក្នុងសន្និសីទពិភពលោកលើកទី៣

●●●" ខ្មែរប៉ុស្តិ៍"បានធ្វើបទសម្ភាសន៍ជាមួយថ្នាក់ដឹកនាំសំខាន់បីរូប ដើម្បីយកព័ត៌មាននៃការវិវត្តន៍ក្នុងសកម្មភាព "រំដោះកម្ពុជាក្រោម" របស់សហព័ន្ធខ្មែរកម្ពុជាក្រោម ដែលមានន័យដូចតទៅនេះ :

**១-វេជ្ជបណ្ឌិតខាងចិត្តវិទ្យា :**

Daryn Reicherter ទីប្រឹក្សាសហព័ន្ធ បំរើការឱ្យប្រជាពលរដ្ឋខ្មែរជាច្រើននៅរដ្ឋ San Jose ។

**សុបិន ថាច់ :** តើលោកវេជ្ជបណ្ឌិតអញ្ជើញមកទីនេះ ក្នុងតួនាទីអ្វី ?

**រីឆឺទ័រ :** ខ្ញុំបានធ្វើការយ៉ាងជិតស្និទជាមួយព្រះតេជគុណ ប៊ីរុងនៅវត្ត សាន់ ហូសេ ក្នុងការស្វែងរកយុទ្ធវិធីណាដែលអាចជួយឱ្យខ្មែរក្រោមអាចយកជ័យជំនះរបស់ខ្លួន មកបង្ហាញពិភពលោកឱ្យបានក្នុងរឿងនេះ រដ្ឋាភិបាលវៀតណាមមិនទទួលស្គាល់សោះនៅទីនោះ សមាជិកខ្មែរក្រោមមានវត្តមានច្រើន ។

**សុបិន ថាច់ :** ធ្វើការបំរើសិទ្ធិមនុស្ស ជាជនជាតិអាមេរិកាំង តើអ្វីដែលនាំឱ្យលោកចូលមកបំរើបុព្វហេតុខ្មែរក្រោម ?



**រីឆឺទ័រ :** ខ្ញុំមិនដឹងឆ្លើយរបៀបណាឱ្យបានច្បាស់លាស់នោះទេ ការដែលសំខាន់ គឺពួកខ្មែរក្រោមបានត្រូវគេគាបសង្កត់ជាប្រចាំ នៅគ្រប់កន្លែង និងនៅច្រើនជំនាន់នៃប្រវត្តិសាស្ត្រម្តងហើយម្តងទៀត សិទ្ធិរបស់គេ បានត្រូវគេបំភ្លេចចោលទៅតាមរូបភាពឥទ្ធិពលនយោបាយ ។ ការចូលរួមដ៏សំខាន់របស់ខ្ញុំ គឺមានលក្ខណៈជាកិច្ចការការពារទូទៅមិនត្រឹមតែការពារខ្មែរក្រោមប៉ុណ្ណោះទេ បានន័យថា តាមរយខ្មែរក្រោមខ្ញុំអាចនិយាយអំពីការរំលោភសិទ្ធិមនុស្ស ។ ក្រុមខ្មែរក្រោម គឺជាក្រុមដ៏គួរឱ្យគោរពមួយ ដែលកំពុងធ្វើការនៅលើប្រធានបទដ៏ជាក់ស្តែងគ្មានលក្ខណៈដាច់ខាតនិយម ។ ផ្លូវដែលខ្ញុំបានជ្រើសរើសនោះ គឺព្រះតេជគុណ ថាច់ ប៊ីរុង បានបំរើក្នុងការណែនាំដល់ប្រជាពលរដ្ឋ នៅ សាន់ ហូសេ ទាំងមូលពុំមែនតែខ្មែរក្រោមតែមួយនោះទេ ខ្ញុំក៏មានសកម្មភាពដូចនោះដែរ ជាមួយពលរដ្ឋក៏ដូចជាមួយភ្ញៀវដែលមករកខ្ញុំដូច្នោះដែរ ក្នុងដំណាក់ការនៃការចូលរួមក្នុងចលនាខ្មែរក្រោមនេះ ក៏ក្លាយទៅជាធម្មជាតិរបស់ខ្ញុំងាយស្រួលឱ្យខ្ញុំ ចូលរួមក្នុងចលនាវត្តខ្មែរ និងចលនាសហព័ន្ធបានយ៉ាងស្រួល ។

**សុបិន ថាច់ :** ចុះនៅដំណាក់ការណ៍ពីរបីខាងមុន តើលោកគិតថា នឹងផ្តល់យោបល់អ្វីថ្មីទៀតដល់ខ្មែរក្រោម ?

**រីឆឺទ័រ :** អ្វីដែលខ្ញុំចាប់អារម្មណ៍នោះ គឺផ្តោតចំពោះអ្នកដែលកំពុងឋិតនៅក្នុងការគាបសង្កត់ក្នុងផ្នែកខ្លះនៃពិភពលោកនៅឡើយ អ្នកទាំងនោះពុំបានទទួលនូវសិទ្ធិជាមូលដ្ឋានរបស់ខ្លួននៅឡើយ នេះជាការផ្តោតអារម្មណ៍យ៉ាងសំខាន់របស់ខ្ញុំ រីឯគោលបំណងដ៏ទៃទៀតរបស់សហព័ន្ធ ដូចជាផ្នែកទឹកដី ជំនឿសាសនា ។ល។ គឺនៅមានដំណាក់កាណ៍ច្រើនទៅទៀត ដែលខ្ញុំពុំទាន់ដឹងនៅឡើយថា នឹងផ្តល់យោបល់របៀបណានោះទេ ។ ដូច្នេះអ្វីដែលនៅឆ្ងាយពីបញ្ហាយុត្តិធម៌ និងសិទ្ធិមនុស្សជាមូលដ្ឋាន ខ្ញុំពុំបានធ្វើនៅឡើយ ខ្ញុំខំផ្តោតការណែនាំដល់ខ្មែរក្រោមដល់ក្រុមយុទ្ធ-ជនតែពីសិទ្ធិជាមូលដ្ឋាន ដែលមនុស្សត្រូវមាននាពេលនេះ ។

**សុបិន ថាច់ :** សូមអរគុណលោកវេជ្ជបណ្ឌិត រីឆឺទ័រ ។

**២- លោក ថាច់ងុកថាច់**

ប្រធានសហព័ន្ធខ្មែរកម្ពុជាក្រោម តាំងសំនួរដោយ សុបិន ថាច់ :

**សុបិន ថាច់ :** តើតួនាទីរបស់លោកក្នុង "យុវជនខ្មែរកម្ពុជាក្រោម " ជាអ្វីទៅ ?

**ថាច់ងុកថាច់ :** ខ្ញុំជាប្រធានប្រតិបត្តិ " សហព័ន្ធខ្មែរកម្ពុជាក្រោម " ដូច្នេះ គណកម្មការ "យុវជនខ្មែរកម្ពុជាក្រោម " គឺជាគណកម្មការមួយស្ថិតក្រោមការគ្រប់គ្រងរបស់ "សហព័ន្ធ"។

**សុបិន ថាច់ :** តើគម្រោងរៀបចំនៅហ្វីឡា-ដែលហ្វីយ៉ានេះ តើលោកចង់បានអ្វី ?

**ថាច់ងុកថាច់ :** គម្រោងនោះ គឺយើងចង់ស្នើសំណូមពរឱ្យខាងយុទ្ធជនខ្មែរក្រោមនោះ ទី១គឺយុវជនចេះរួបរួមគ្នា ទី២- សុំឱ្យយល់ពីដំណើរទុកលំបាករបស់ឪពុកម្តាយរបស់ខ្លួន ដែលបាននាំឱ្យកូនចៅមកដល់ប្រទេសទី៣ ហើយសូមឱ្យកូនក្មួយនៅចងចាំពីការរងទុក្ខទាំងនោះ ហើយបន្តការ ដឹកនាំរំដោះម្តាយឪពុកនិងញាតិមិត្តកុំឱ្យនៅមានការរងទុក្ខតទៅទៀត ខ្ញុំចង់ឃើញយុទ្ធជន ដែលបានមករៀនសូត្រជ្រៅជ្រះចែករំលែកការចេះដឹងរបស់ខ្លួនមកជួយឪពុកម្តាយបងប្អូនដែលនៅរងទុក្ខវេទនាឱ្យបានរួចចាក់ពីទុក្ខវេទនាទាំងនោះផង ។



**សុបិន ថាច់ :** ចែករំលែកចំណេះទៅជួយឪពុកម្តាយ បងប្អូន តើទៅជួយយ៉ាងម៉េចខ្លះ ?

**ថាច់ងុកថាច់ :** សហព័ន្ធយើងបានធ្វើការច្រើនឆ្នាំហើយ តែទៅមិនរួច ហើយនៅបួនប្រាំឆ្នាំចុងក្រោយនេះ នៅពេលមានយុវជនមកជួយឃើញថា ស្ថានភាពបានធូស្រាលច្រើន ដែលយើងចង់ឱ្យមកជួយនេះ ព្រោះយើងដឹងថា មានខ្មែរយើងជាច្រើនមិនចង់មកជួយ ព្រោះខ្លាចយើងធ្វើនយោបាយ គេថានយោបាយធ្វើឱ្យយើងស្លាប់ខ្លួន ឬជាប់គុក ហើយខ្លះទៀតថាខ្លាចមិនអាចទៅលេងស្រុកទេសបានខ្ញុំបានឆ្លើយថា ទៅលេងស្រុកមិនបានជារឿងតូចទេ តែគ្មានស្រុកទៅលេងនឹងគេឯណោះទេទើបសំខាន់ ។ ហេតុដូច្នេះ ហើយទើបយើងចង់ឃើញយុវជនយើងចូលរួមជួយ គឺជួយឱ្យមានការគោរពសិទ្ធិមនុស្សនៅលើដែនដីយើងបញ្ហាសិទ្ធិមនុស្សនៅលើពិភពលោកនេះ ប្រទេសយួនក្តីប្រទេសផ្សេងៗក្តី ពុំអាចរស់នៅឯកោអនាថានោះបានទេ គេត្រូវរស់នៅជាមហាគ្រួសារនៃពិភពលោក ដូច្នេះយុវជនហ្នឹងអាចធ្វើការស្របច្បាប់ពិភពលោកបាន ពីព្រោះចេះភាសាច្បាស់លាស់ ដោយសារមានចំណេះប្រាជ្ញាច្រើនជាងឪពុកម្តាយ ដូច្នេះយុវជនខ្មែរក្រោមអាចធ្វើការស្របច្បាប់មិនលាក់លៀម ដោយសារយុទ្ធជនខ្មែរក្រោមនោះ បានទទួលការគាំទ្រដោយសេចក្តីប្រកាសរបស់ អ.ស.ប ចុះថ្ងៃ ទី ១៣ កញ្ញា ឆ្នាំ ២០០៧ បានបោះឆ្នោតយល់ព្រមចំនួន១៤៣ ក្នុងចំណោម១៩២ប្រទេស គឺសេចក្តីប្រកាសមាន៤៦មាត្រា ដែលយើងបានយកមកប្រើប្រាស់ជាជនជាតិពិភពលោកដែលមានចំនួន៣៧០លាននាក់ ។ ដូច្នេះសូមចលនាអ្នកសារព័ត៌មានជួយជម្រាបដល់ឪពុកម្តាយដល់យុវជនឯទៀត ឱ្យយល់ច្បាស់ថានេះជាចលនាទំនាក់ទំនងនឹងសិទ្ធិមនុស្ស ដែលខុសពីទំនាក់ទំនងនយោបាយ ដូច្នេះដោយសារគំនិតសង្គ្រោះមនុស្សសហព័ន្ធ និងយុវជនខ្មែរក្រោមនៅបរទេស នឹងមិនធ្វើឱ្យបងប្អូនដូនតា មាមីង និងយុវជនក្លាយជាជនរងគ្រោះនោះទេ ។

**សុបិន ថាច់ :** តើនៅមានសកម្មភាពអ្វីខ្លះទៀតទេ ដែលលោកអាចជម្រាបសាធារណជនបាន ?

**ថាច់ងុកថាច់ :** សកម្មភាពថ្មីៗ យើងមានសេចក្តីរីករាយ នឹងជម្រាបថា យើងសម្រេចធ្វើផែនការបីខែ ដែលបង្រួបបង្រួមសហគមន៍ខ្មែរក្រោមនៅញូសេឡិន នៅអូស្ត្រាលី នៅអាហ្វ្រិក

តទៅទំព័រទី១២

**The Khmer Post Directory**

**East Coast Publication**

Regional Editor : Pin Samkhon

Email : pinsamkhon@gmail.com

Writers : Mam Yin
Kim Phean
Im Loeurm
Bopea Chum

**Advertising**

**Marketing Manager:**

**Sabane Thach**

**Phone : 267-253-3947**

**Email : sabane.thach@gmail.com**

**West Coast Publication**

RegionalEditor : Sovannara Meach

Writers : Kim Saroeurn
Ra Neat
Sophea Rith
Mey Sampos
Chan Kosal
Sovann Rith

**Phone: (562) 313-2129**

**Email: sovannara04@yahoo.com**

# មេបក្សប្រឆាំងខ្មែរពីរជួបគ្នានៅអាមេរិក

**ដោយ : អ៊ុម លឿម**

•••តាមការអះអាងពីប្រធានសាខាគណបក្សសិទ្ធិមនុស្ស ប្រចាំសហរដ្ឋអាមេរិក និងប្រធានសាខាគណបក្ស សម រង្ស៊ី បានឱ្យដឹងថា : លោក កឹម សុខា និងលោក សម រង្ស៊ី បានធ្វើដំណើរមកកាន់សហរដ្ឋអាមេរិក ក្នុងដំណើរទស្សនៈកិច្ចក្រៅផ្លូវការមួយ ដោយការបរិច្ឆេទខុសៗគ្នា ក្នុងគោលបំណងពង្រីក និងពង្រឹងនូវចលនាសម្ព័ន្ធរបស់គណបក្សនៅឯនាយសមុទ្រ ព្រមទាំងស្វែងរកនូវការគាំទ្រនានាមួយចំនួនទៀត ។ ប្រធានសាខាគណបក្សសិទ្ធិមនុស្ស ប្រចាំសហរដ្ឋអាមេរិក លោក ញ៉យ ចំរើន បានផ្តល់នូវព័ត៌មាននានា ជុំវិញដំណើរទស្សនៈកិច្ចរបស់ប្រធានគណបក្សសិទ្ធិមនុស្ស គឺលោក កឹម សុខា ដល់ខ្មែរប៉ុស្តិ៍ថា : "លោកនឹងអញ្ជើញមកដល់សហរដ្ឋអាមេរិក នៅថ្ងៃទី ០៥ ខែមិថុនា នឹងវិលត្រឡប់ទៅកាន់ប្រទេសកម្ពុជាវិញ នៅដើមខែកក្កដាខាងមុខនេះ " ។

គោលបំណងសំខាន់ក្នុងដំណើរទស្សនៈកិច្ចរបស់ប្រធានគណបក្សសិទ្ធិមនុស្ស ត្រូវបានលោក ចំរើន បញ្ជាក់ប្រាប់ខ្មែរប៉ុស្តិ៍ មានចំនួនពីរចំណុចសំខាន់ៗ ដោយទី១ គឺជួបជាមួយមន្ត្រីរដ្ឋាភិបាលរបស់សហរដ្ឋអាមេរិក និងមន្ត្រីអង្គការក្រៅរដ្ឋាភិបាល ព្រមទាំងអង្គការស៊ីវិលជាដើម ពីថ្ងៃទី៨ ដល់ថ្ងៃទី ១២ មិថុនា ។ និងទី២- ដើម្បីចូលរួមធ្វើមហាសន្និបាតគណបក្សដ៏ធំមួយ នៅឯទីក្រុងឡុងប៊ិច នៃរដ្ឋ កាលីហ្វរនៀ ដែលនឹងប្រព្រឹត្តធ្វើឡើងនៅថ្ងៃទី០៤ កក្កដា គឺចំនឹងថ្ងៃបុណ្យឯករាជ្យជាតិរបស់សហរដ្ឋអាមេរិកផងដែរ ។



ដោយឡែក លោក មាស ជា ប្រធានសាខាគណបក្ស សម រង្ស៊ី ប្រចាំរដ្ឋ ផែនស៊ីវែនៀ ក៏បានឱ្យខ្មែរប៉ុស្តិ៍ដឹងផងដែរថា : លោក សម រង្ស៊ី បានអញ្ជើញមកដល់សហរដ្ឋអាមេរិក នៅថ្ងៃទី ២៩ ខែឧសភានេះ ហើយលោកនឹងវិលត្រឡប់ទៅកាន់ប្រទេសកម្ពុជាវិញ នៅពាក់កណ្តាលខែមិថុនា ។

គោលបំណងសំខាន់ក្នុងដំណើរទស្សនៈកិច្ចរបស់ប្រធានគណបក្សសិទ្ធិមនុស្ស ត្រូវបានលោក ចំរើន បញ្ជាក់ប្រាប់ខ្មែរប៉ុស្តិ៍ មានចំនួនពីរចំណុចសំខាន់ៗ ដោយទី១- គឺជួបជាមួយមន្ត្រីរដ្ឋាភិបាលរបស់សហរដ្ឋអាមេរិក និងមន្ត្រីអង្គការក្រៅរដ្ឋាភិបាល ព្រមទាំងអង្គការស៊ីវិលជាដើម ពីថ្ងៃទី ០៨ ដល់ ថ្ងៃទី ១២ ខែមិថុនានេះ ។ ទី២- ដើម្បីចូលរួមធ្វើមហាសន្និបាតគណបក្សដ៏ធំមួយ នៅឯទីក្រុងឡុងប៊ិច នៃរដ្ឋកាលីហ្វរនៀ ដែលនឹងប្រព្រឹត្តធ្វើឡើង នៅថ្ងៃទី ០៤ កក្កដា គឺចំនឹងថ្ងៃបុណ្យឯករាជ្យជាតិរបស់សហរដ្ឋអាមេរិកផងដែរ ។

នៅឯស្នាក់ការបណ្តោះអាសន្នរបស់គណបក្ស សម រង្ស៊ី នៅឯតំបន់ហ្វីឡាដែលហ្វៀខាងត្បូង លោក មាស ជា និងលោក ញ៉យ ចំរើន បានឱ្យ ដឹងថា គណបក្សទាំងពីរ (សម រង្ស៊ី និងសិទ្ធិមនុស្ស)នឹងរៀបចំកម្មវិធីរាត្រីសមោសរធដ៏ធំអស្ចារ្យមួយ ដែលពុំធ្លាប់មានពីមុនមក ដើម្បីទទួលបដិសណ្ឋារកិច្ចថ្នាក់ដឹកនាំកំពូលទាំងពីររូប និងដើម្បីបញ្ជាក់អំពីសម្ព័ន្ធភាពនៃគណបក្សប្រឆាំងទាំងពីរ ។

សូមបញ្ជាក់ផងដែរថា នៅថ្ងៃទី ១២ ខែមិថុនា ឆ្នាំ២០០៩ ខាងមុខនេះ សាខាគណបក្សប្រឆាំងទាំងពីរ បានរួមគ្នាធ្វើពិធីជប់លៀងមួយ នៅឯភោជនីយដ្ឋាន SAIGON MAXIM នាតំបន់ Philadelphia ខាងត្បូង ចាប់ពីម៉ោង ៦ល្ងាច ដល់ម៉ោង ១២យប់ នឹងចូលរួមដោយលោក សម រង្ស៊ី, លោក កឹម សុខា និងឥស្សរជ ននយោបាយមួយចំនួនទៀត ។

គួររំលឹកថា គណបក្សប្រឆាំងទាំងពីរនេះ មានសមាជិកសភាចំនួន ២៦រូប សម្រាប់គណបក្ស សម រង្ស៊ី និងសមាជិកសភាចំនួន ៣រូប សម្រាប់គណបក្សសិទ្ធិមនុស្ស ប៉ុន្តែពុំបានទទួលតំណែងពីរដ្ឋាភិបាល លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន ណាមួយតាមការអំពាវនាវក្នុងក្របខណ្ឌនយោបាយផ្សះផ្សាជាតិនោះឡើយ ។

នៅហ្វីឡាដែលហ្វីយ៉ានេះ គណបក្សដែលកំពុងសកម្មជាងគេ ក្នុងការគ្រប់គ្រង់សកម្មជន គឺគណបក្សសិទ្ធិមនុស្ស ដឹកនាំដោយលោក ញ៉យ ចំរើន រីឯអ្នកមានសមត្ថភាពបន្ទាប់ គឺគណបក្សប្រជាជន ដែលមានការជួបជុំគ្នាម្តងម្កាល ដូចជាថ្ងៃ ៧ មករា ជាដើម ។ រីឯគណបក្ស សម រង្ស៊ី បានស្ងប់ស្ងាត់បន្ថយសកម្មភាពខ្លួនយ៉ាងច្រើន នៅហ្វីឡាដែលហ្វីយ៉ា ប៉ុន្តែដំឡើងសមកម្មភាពនៅ ឡូវែល រដ្ឋម៉ាសាឈូសែត តាំងពីបីបួនឆ្នាំមកហើយ ៕

# អតីតយុទ្ធជនស្ម័គ្រចិត្តត្រូវបានទទួលស្គាល់

•••អតីតយុទ្ធជនខ្មែរ ទើបនឹងបានទទួលស្គាល់នូវគុណបំណាច់ ក្នុងរយៈពេលដែលខ្លួនបានបំរើក្នុងកងទ័ព តើអ្នកទាំងនោះ បានធ្វើអ្វីខ្លះសម្រាប់ប្រវត្តិសាស្រ្តនៅកម្ពុជា **បូពា ជុំ** បានស្តាប់យុទ្ធជនម្នាក់ម្តងៗ ហើយរាយការណ៍ជូនសណ្តាប់ :

## Cambodian Volunteer Reserves to be Recognized :



Somrith Pen was born in Battambang, Cambodia on the 19th of July in 1956. He is the second eldest son of the family. At the age of 15, Somrith left school to join the army because he did not have any money to help support his parents.

He is currently listed as a Major with the United States Volunteer Joint Services Command (U.S.V-J.S.C), Khmer unit, in Philadelphia, Pennsylvania. From 1970-1975, Captain Somrith was deployed as Lead Administrative Support at Base 201 in Battambang. Somrith is one of the luckiest people to survive his military ordeals.

During July of 1975, the year of Pol Pot's victorious overtaking of Cambodia, Somrith was accompanying his fellow servicemen in a military procession to greet Prince Sihanouk when he heard loud, ferocious, crackling sounds. He exclaimed, " I heard the Drrroooottt...sound and I fell to the ground. It was as if something pushed me down and made me fall. I fainted for seven days. When I woke up, I was covered under massive dead rotten, horrific-smelling bodies. That's when I figured something was terribly wrong. There was eerie silence with nothing but the dead lying around.

The Khmer Rouge tricked us. It was a fake procession. We were an easy target for them. We were lined up in a six-by-twelve formation on foot, marching, hoping to catch sight of our then beloved ruler but we were ambushed instead. The dead could not pass on the information to



the other soldiers. We were given an order to follow and that's what we did. Somrith came to the United States in March of 1982. He is the executive director of the U.S.V-J.S.C., Khmer Command. Somrith is extremely proud of being a part of the U.S. Army Volunteer Reserves. " I am able to do what I love best and that is organizing and mobilizing my

(Continue to Page18)




# ក្តីស្នេហ៍គ្មានទីបញ្ចប់

**ដោយ : គីម ភឿន** ***(តពីលើកមុន)***

●●●នោះជាព្រឹកថ្ងៃច័ន្ទ អាកាសធាតុកក់ក្តៅគួរឱ្យត្រេកត្រអាល ខ្យល់បក់រំភើយ ផ្ទៃមេឃខៀវស្រឡះល្អ រថយន្តស៊ីពយោធាជាជំនួយពីកងទ័ពជើងគោកអាមេរិកាំងមួយគ្រឿងបានបោះពួយយ៉ាងលឿនចេញពីក្រសួងការពារជាតិកាត់ជ្រែករថយន្ត ម៉ូតូ កង់ស៊ីក្លូ តម្រង់ទៅពោធិ៍ចិនតុង ។ តាមមហាវិថីដ៏ស្អាតស្រឡះជាទីគួរឱ្យមោទនភាពថ្ងៃណាមួយក្នុងអតីតកាលនោះ ឥឡូវប្រែក្លាយជាសោះកក្រោះ ចង្អៀតចង្អល់ រកេតរកូត ទៅដោយរបាំងលួសបន្លារាំងការពារ មានយោធាឈរយាមឆែកឆេរកុំឱ្យខ្មាំងសត្រូវកុម្មុយនិស្តយួន និងខ្មែរក្រហមចូលមកយាយី អុកឡុកទីក្រុងភ្នំពេញ ។ ពេលរថយន្តស៊ីពបើកទៅជិតដល់របាំងនិមួយៗតែងតែបន្ថយល្បឿន រួចហើយឈប់ស្ងៀម ទាហ៊ានឈរយៀម ស្ពាយកាំភ្លើង១៦ ដើរតម្រង់មកសម្លឹងពិនិត្យរថយន្តស៊ីព ស្រាប់តែនាយ-ពលទោឈរក្នុងសភាពប្រុងត្រង់ខ្លួនលើកដៃគំនាប់ដោយគោរព : " សូមទោសលោកសក្តិបីខ្ញុំសុំពិនិត្យ! " ។ នាយទាហ៊ាន មានឋានន្តរសក្តិជាអនុសេនីយ៍ឯក អង្គុយនៅក្បែរស្នូភើ គំនាប់តបវិញរួចងក់ក្បាលឱ្យពលទោចូលធ្វើការងាររបស់ខ្លួន។



-សូមព្រះតេជគុណមេត្តាបង្ហាញលិខិតបង្គាប់ការ!។ លោកអនុសេនីយ៍ឯកហូតលិខិតបង្គាប់ការចេញពីសំពាត ហុចទៅឱ្យអ្នកត្រួតពិនិត្យ ។ ក្រោយពីពិនិត្យលិខិតយ៉ាងផ្ចិតផ្ចង់រួចហើយ ពលទោបែរមកគំនាប់អនុសេនីយ៍ឯក ដោយគោរព : " សូមព្រះតេជគុណអញ្ជើញទៅសុខសប្បាយ! " ។ និយាយចប់ភ្លាមពលទោហុចលិខិតជូនមកម្ចាស់ដើមវិញ លើកដៃគោរពម្តងទៀត។ លោកនាយទាហ៊ានគំនាប់តបវិញដោយញញឹម : " អរគុណ! " ។ លោកពលបាលឯកជាស្នូភើបើករថយន្តចេញទៅមុខបណ្តើរ និយាយទៅកាន់ចៅហ្វាយបណ្តើរ : នេះជាទាហ៊ានខ្មែរកម្ពុជាក្រោមហៅថា Mike's force ។ កុំបានពួកនេះ មកជួយទាន់សមម៉្លេះភ្នំពេញត្រូវបានពួកទមិឡកុម្មុយនិស្តយួនខាងជើងត្រួតត្រាយូរណាស់ហើយ ។ លោកអនុសេនីយ៍ឯកក៏ចូលរួមបញ្ចេញយោបល់ជាមួយអ្នកបើកបររបស់ខ្លួន : ពួកនេះជាទាហានមានវិន័យណាស់ ។ ពួកគេបានលោក សឺនង៉ុកថាញ់ បង្កើតឡើង




នៅកម្ពុជាក្រោម ក្រោមការយល់ព្រមពីសំណាក់រដ្ឋាភិបាល ង៉ោ ឌិញយៀម និងការឧបត្ថម្ភពីកងទ័ពអាមេរិកាំង ក្នុងបំណង ចង់ជួយអាមេ-រិកាំងច្បាំងតទល់នឹងកុម្មុយនិស្ត យួននៅវៀតណាមខាងត្បូង ។ តែធាតុពិត មាន-បង្កប់អត្ថន័យវែងឆ្ងាយជាងនេះទៅទៀត។ លោក សឺនង៉ុកថាញ់ យល់ឃើញថា ជនជាតិខ្មែរក្រោម ចេះតែត្រូវយួនទាំងសងខាងចាប់ទៅធ្វើទាហានឱ្យពួកគេ ហើយខ្មែរកម្ពុជាក្រោមទាំងនោះត្រូវប្រឈោមមុខនៃការសម្លាប់គ្នាឯងក្រោម បញ្ជាពីចៅហ្វាយទាំងសងខាងសុទ្ធតែជាយួន ។ ខ្មែរក្រោមអាចស្លាប់ដាច់ពូជថ្ងៃណាមួយមិនខាន ដោសសារតែសង្គ្រាមមួយគ្មានន័យចំពោះ ខ្មែរកម្ពុជាក្រោមខ្លួនឯង ។ លោក សឺនង៉ុកថាញ់ ដិបូងក្នុងរូបភាពប្រឆាំងនឹងសម្តេចឪ សីហនុ បានបង្កើតទ័ពទឹងរបស់ខ្លួននៅលើខ្នងភ្នំដងរ៉ែក ។ ដោយឃើញសភាពការណ៍មានអំណោយ ផលឱ្យគម្រោងការណ៍របស់លោក លោកក៏ឆ្លៀតចាកចេញពីភ្នំដងរ៉ែក ទៅបន្តកិច្ចការថ្មីមួយទៀតនៅព្រៃនគរ និងកម្ពុជាក្រោម ។ លោកមានគោលបំណងប្រមែប្រមូលបងប្អូនខ្មែរក្រោមឱ្យចូលនៅក្នុងអង្គភាពតែមួយ ដើម្បីច្បាំងជាការខានពុំបានផង និងពិសេស បង្កើតឱ្យបានជាកម្លាំងការពារគ្នាឯងផង ។ តាមមាគ៌ានេះខ្មែរកម្ពុជាក្រោម អាចដឹកនាំជនជាតិខ្លួនឯងក្នុងចំបាំងមួយដែលគ្មានប្រយោជន៍ឱ្យខ្លួនឯងសោះក៏ពិតមែនតែអាចការពារខ្លួនកុំឱ្យពួកយួនទាំងសងខាងសម្លាប់បានដោយងាយៗ ពេក ។ ពេលស្រុកខ្មែរយើងមានអាសន្ន ដោយពួកកុម្មុយនិស្តយួនរុករានក្រោមផ្លាកជួយយកអាសារស្តេចខ្មែរ គឺសម្តេចឪ លោក សឺនង៉ុកថាញ់ បាន បញ្ជូនកងទ័ពរបស់លោកមកទប់ទល់ ហើយវាយបណ្តេញពួកឈ្លានពាននេះឱ្យចេញឆ្ងាយពីខ្សែក្រវាត់ភ្នំពេញ បានដោយលំបាក ។ ព្រោះពេលនេះទ័ពលោក លន់ នល់ មានតែបន្តិចបន្តួចឯទ័ពយួនខាងជើង និងខាងវៀតកុងវិញ បានបង្កប់នៅស្ទើរតែពេញស្រុកខ្មែរអស់ទៅហើយ ។ បើកុំតែបានជំនួយទ័ពពីលោក កុំអីពួកយួនកុម្មុយនិស្ត អាចយាងសម្តេចឪ ឱ្យមកសោយរាជ្យ ហើយដឹកនាំស្រុកខ្មែរក្រោមបញ្ជារបស់ពួកវាដូចគម្រោងដែលពួកវាបានគិតទុកស្រេចពីមុនមក" ។ និយាយចប់ភ្លាមលោកអនុសេនីយ៍ឯក ដកដង្ហើមធំ ហើយវែងភ្នែកទាំងពីរសម្លឹងទៅឆ្ងាយហាក់ដូចកំពុងគិតទៅដល់រឿងអ្វីមួយរកចម្លើយពុំចេញ ។ នៅតាមបណ្តោយផ្លូវទៅកាន់ខេត្ត-តាកែវ ពួកទាហានមៃហ្វកនេះ បានទទួលភារកិច្ចជាអ្នកថែរក្សាសន្តិសុខ ការពារចរាចរឱ្យមានសុវត្ថិភាព គេបាននាំគ្នារស់នៅទាំងក្រុមក្រោមកូនខ្ទមតូចៗ ខ្លះនៅក្រោមស្ពាន ខ្លះបានទាំងនាំប្រពន្ធកូនមកនៅជាមួយខ្លួនផង ក្នុងលទ្ធភាពដ៏យ៉ាប់យឺនយ៉ាងនេះ។ លោកអនុសេនីឯក អង្គុយយ៉ាងស្ងាត់ស្ងៀមក្បែរនាយពលបាលឯកជាអ្នកបើកបរ ចិត្តគាត់សែនសង្វេគដល់យុទ្ធជនទាំងនេះហួសនិស្ស័យនឹងថ្លែង! ស្រាប់តែគាត់ភ្ញាក់ខ្លួនមកកាន់បច្ចុប្បន្នភាពភ្លាម ដោយឮសម្លេងនាពលបាលឯកបន្លឺឡើង : 'ខាងមុខនោះ គឺផ្សារអង្គតាសោម តេជគុណឱ្យឈប់នៅផ្សារ ឬចង់អញ្ជើញទៅណាទៀត?' ។ គាត់ចង្អុលទៅផ្លូវលំមួយខាងឆ្វេងដៃ : ' បត់ឆ្វេងតាមផ្លូវ នោះ រួចបើកចូលទៅក្នុងវិទ្យាល័យអង្គតាសោម នៅខាងស្តាំ **តទៅលេខក្រោយ**

តមកពីទំព័រទី០១

## ខួប១ឆ្នាំខ្មែរប៉ុស្តិ៍

ចង់ចែករំលែកនូវចំណេះវិជ្ជាដែលសំដែងចេញពីរូបភាពពិតនៃព្រឹត្តិការណ៍ផ្សេងៗ ដែលកើតឡើងនៅពាសពេញលើពិភពលោកតាមរយៈសារព័ត៌មាន និង វិទ្យុផ្សាយសម្លេង ។

**គោលបំណង :**

សារព័ត៌មានខ្មែរប៉ុស្តិ៍ ដែលបានកើតឡើងនៅក្នុងសហរដ្ឋអាមេរិកនេះ គឺមានគោលបំណងចង់បញ្ចេញចំណេះវិជ្ជាចេះដឹងរបស់ជនជាតិខ្មែររួមឈាមមួយចំនួនដែលជាបញ្ញាវន្តធ្លាប់មានការរស់នៅក្នុងគ្រប់កាលសម័យ ហើយមានការតាមដាន និងដកស្រង់ការពិសោធន៍ក្នុងកិច្ចការនយោបាយដឹកនាំប្រទេសរបស់មេដឹកនាំខ្មែរទាំងអស់នោះមកសរសេរបញ្ចេញទស្សនវិស័យធ្វើវិភាគពន្យល់បំភ្លឺដល់ជនានុជនរួមឈាមទាំងអស់ឱ្យបានយល់ដឹងច្បាស់លាស់នូវរឿងពិតប្រាកដជាច្រើន ដែលគេព្យាយាមលាក់បំបិទមិនឱ្យជាតិខ្មែរយល់ដឹង ដើម្បីគេដឹកនាំប្រទេសជាតិខ្មែរឱ្យទៅតាមមហិច្ឆតាលោភលន់របស់ប្រទេសជិតខាង ធ្វើឱ្យប្រទេសជាតិខ្មែរត្រូវធ្លាក់ទៅក្នុងមហន្តរាយមួយ ដូចគ្នាដែនដី និងជាតិខ្មែរនៅកម្ពុជាក្រោមដែលសព្វថ្ងៃបានក្លាយទៅជារបស់ជនជាតិសៀមសព្វគ្រប់ដែរ ។

**សកម្មភាពរយៈពេល១ឆ្នាំ :**

សារព័ត៌មានខ្មែរប៉ុស្តិ៍ចេញផ្សាយនៅទីក្រុងហ្វីឡាដែលហ្វីយ៉ា បានប្រកាសដោយចេញមុខ និងដោយក្លាហានថា ជាសារព័ត៌មានខ្មែរឯករាជ្យ គ្មានប្រកាន់និន្នាការនយោបាយ និងប្រកាន់គោលការណ៍សច្ចៈ យុត្តិធម៌ និងមានឆន្ទៈ ឧត្តមគតិមនសិការជាតិ ប្តេជ្ញា បំរើផលប្រយោជន៍ជាតិ និងសង្គមជាតិ ។

រយៈពេល១ឆ្នាំសារព័ត៌មានខ្មែរប៉ុស្តិ៍បានមានជីវិតរស់ក្នុងសភាពគួរឱ្យព្រួយបារម្ភដែរ ដោយសារតែសារព័ត៌មាននេះ កំពុងស្ថិតនៅក្នុងវ័យជាទារកនៅឡើយ ហើយត្រូវការទឹកដោះគោ និងអាហារដ៏មានរសជាតិជីវជាតិបរិបូរសំរាប់បំប៉នឱ្យបានធំធាត់ចំរើនវ័យឡើង ។

ទារកខ្មែរប៉ុស្តិ៍ក្រោយពីបានប្រសូតមកម្តាយ និងឪពុកបានបំប៉នបំបៅដោយទឹកដោះខ្លួនឯង ដែលពុំសូវមានបរិបូរធ្វើឱ្យទារកខ្មែរប៉ុស្តិ៍មាន ពេលខ្លះ បៅពុំបានគ្រប់គ្រាន់ ហើយមានរូបរាងកាយស្គាំងស្គមម្តាយឪពុកខិតខំដើរស្វះស្វែងរកសុំទឹកដោះពីបងប្អូនញាតិមិត្តឱ្យជួយផ្តល់ទឹកដោះ ឬ អាហារពិសេសសំរាប់ទារកយកមកបន្ថែមបំប៉នឱ្យបានរស់រានមានជីវិតតទៅ ។

មកដល់ថ្ងៃនេះ ទារកខ្មែរប៉ុស្តិ៍មានអាយុបាន១ឆ្នាំពេញបរិបូរហើយ ហើយទារកនៅតែមានលក្ខណៈខ្វះខាតទឹកដោះ និងអាហារពិសេសនៅឡើយ ពីព្រោះជំនួយពីបងប្អូនញាតិសណ្តាននៅតែពុំទាន់បានគ្រប់គ្រាន់នៅឡើយ ។

ប៉ុន្តែបើកាលណាយើងក្រឡេកមកមើលសកម្មភាពរបស់សារព័ត៌មានខ្មែរប៉ុស្តិ៍វិញ សង្កេតឃើញថា សារព័ត៌មានខ្មែរប៉ុស្តិ៍បានផ្តល់នូវម្ហូបអាហារយ៉ាងឈ្ងុយឆ្ងាញ់ជាច្រើនមុខខាងសតិអារម្មណ៍ដល់សង្គមជាតិខ្មែរ គ្រប់ស្រទាប់ឱ្យបានក្រេបជញ្ជក់រសជាតិសំរាប់ជីវិតរបស់ខ្លួនបានល្អប្រពៃគួរជាទីសង្ឃឹមទាំងក្នុងចំណេះវិជ្ជាទូទៅក្នុងការដោះស្រាយបញ្ហាសង្គមគ្រួសារ និងសង្គមជាតិក្នុងការរួបរួមសាមគ្គីគ្នាក្នុងការស្រឡាញ់មេត្រីរាប់អានគ្នាក្នុងការជួយសង្គ្រោះគ្នា និងក្នុងការចែករំលែកសេចក្តីសុខទុក្ខជាមួយគ្នាប្រៀបដូចជាក្រុមគ្រួសារតែមួយ ។

មានកិច្ចការជាច្រើន ដែលសារព័ត៌មានខ្មែរប៉ុស្តិ៍ និងក្រុមប្រឹក្សាភិបាលមានលោក រ៉ូដ័រ សំខុន ពិន ជាប្រធានបានរួមដៃរួមចិត្តបំពេញភារកិច្ចយ៉ាងអង់អាចក្លាហានហ៊ានចេញមុខសរសេរអត្ថបទផ្នែកនយោបាយផ្នែកសង្គមកិច្ចផ្នែកសាសនា ផ្នែកសេដ្ឋកិច្ច ផ្នែកយុត្តិធម៌សង្គមផ្នែកសិទ្ធិសេរីភាព ជាពិសេសផ្នែកសិក្សាធិការអប់រំដែលជាស្ថាប័នសំខាន់បំផុត ហើយជាមូលដ្ឋាននៅក្នុងប្រព័ន្ធនយោបាយដឹកនាំប្រទេសជាតិទៅតាមគោលការណ៍របបប្រជាធិបតេយ្យពិតប្រាកដប្រឆាំងនឹងរបបផ្តាច់ការ ដែលស្ថិតនៅមានក្នុងប្រទេសនានាមួយចំនួនរួមមានទាំងប្រទេសខ្មែរផងដែរ ដែលកំពុងធ្វើនយោបាយរណបប្រទេសជិតខាងមួយធ្លាប់មានមហិច្ឆតាលោភលន់រំលោភយកទឹកដីខ្មែរ ។

ការសរសេរអត្ថបទផ្សព្វផ្សាយអំពីបញ្ហាពិតៗដែលកើតមាននៅក្នុងប្រទេស និងក្រៅប្រទេសខ្មែរ ហើយដែលប៉ះពាល់ដល់ផលប្រយោជន៍សំខាន់ៗ និងអាយុជីវិតនៃប្រទេស និងជនជាតិខ្មែរនេះ គឺជាគោលការណ៍ និងជាគោលបំណងធំចម្បងរបស់សារព័ត៌មានខ្មែរប៉ុស្តិ៍ ដែលមានអាយុបាន១ឆ្នាំកន្លងទៅនេះ ។

ក្រុមប្រឹក្សាភិបាលសារព័ត៌មានខ្មែរប៉ុស្តិ៍បានប្តេជ្ញាចិត្តថា នឹងបន្តកិច្ចប្រឹងប្រែងស្វះស្វែងរកព័ត៌មានដំណឹង និងមតិយោបល់ល្អៗមានអត្ថប្រយោជន៍សំខាន់ៗ ដល់មាតុភូមិ និងជនជាតិខ្មែរដើម្បីផ្តល់ចំណេះដឹង និងទស្សនវិស័យជាពន្លឺដល់សតិបញ្ញាសតិសម្បជញ្ញៈវិចារណញ្ញាណ និងសុឆន្ទៈដែលប្រជាពលរដ្ឋខ្មែរម្នាក់ៗ ដើម្បីជួយស្រោចស្រង់សង្គមគ្រួសាររបស់ខ្លួន និងសង្គមជាតិទាំងមូលឱ្យបានស្ថិតនៅក្នុង ឯករាជ្យភាព ឧត្តមភាព ឥស្សរភាព សិទ្ធិសេរីភាព សុខសន្តិភាព និងនិរន្តរភាពជារៀងរហូតតទៅ ។

រយៈពេល១ឆ្នាំ នៃសារព័ត៌មានខ្មែរប៉ុស្តិ៍ គឺជាពេលវេលាពោរពេញទៅដោយសេចក្តីសង្ឃឹម សេចក្តីសប្បាយរីករាយសេចក្តីស្រឡាញ់មេត្រីរាប់អាន និងសេចក្តីរួបរួមសាមគ្គីគ្នាយ៉ាងជិតស្និទរវាងអស់លោក លោកស្រី អ្នកនាងកញ្ញា ជាប្រិយមិត្តអ្នកអានគ្រប់មជ្ឈដ្ឋាន ដែលបានជួយគាំទ្រឧបត្ថម្ភ ផ្គត់ផ្គង់ ឱ្យសារព័ត៌មានខ្មែរប៉ុស្តិ៍បានរស់រានមានជីវិត រហូតមកដល់ថ្ងៃនេះ ហើយមានសង្ឃឹមយ៉ាងមាំថា ទៅថ្ងៃមុខប្រិយមិត្តទាំងអស់នឹងនៅតែបន្តការគាំទ្រ ហើយនឹងខំបង្កើនការគាំទ្រកាន់តែខ្លាំងឡើងទៀត ជួយផ្តល់មធ្យោបាយផ្នែកហិរញ្ញវត្ថុ ដើម្បីឱ្យយើងខ្ញុំមានលទ្ធភាពពេញបរិបូរក្នុងការពង្រីង និងពង្រីកសកម្មភាពខាងប្រមែប្រមូលព័ត៌មានដំណឹង និងអត្ថបទសំខាន់ៗយកមកចុះផ្សាយជូនអានឱ្យបានកាន់តែពេញចិត្តមិនឱ្យខុសបំណងឡើយ ។

ក្រុមប្រឹក្សាភិបាលសូមប្រសិទ្ធិពរជ័យសិរីមង្គលវិបុលសុខមហាប្រសើរគ្រប់ប្រការ មានក្តីសុខសាន្តចំរើនរុងរឿងមានអាយុយឺនយូរ និងមានជោគជ័យនៅក្នុងកិច្ចប្រកបការងារប្រចាំជីវិត ព្រមទាំងមានសុភមង្គលល្អប្រពៃនៅក្នុងគ្រួសារគ្រប់ៗគ្នាកុំបីឃ្លាងឃ្លាតឡើយ ៕

***សូមអរគុណ !***

# កោតសរសើរ សុបិន ថាច់

…សុបិន ថាច់ បានសម្រេច អនាគតនៅពេលទទួលបរិញ្ញាប័ត្រឧត្តមសិក្សានៃសាកលវិទ្យាល័យ "ផែនស៊ីវេនា ស្តេតយូនីវ៉ាសីទី " កាលពីថ្ងៃទី ១៦ ឧសភា ឆ្នាំ ២០០៩

Bachelor of Science

Major in Human Development and Family Studies

Minor in Civic and Community Engagement មុននេះ១០ឆ្នាំសោះ សុបិន បានចេញផុតពីជីវភាពភិតភ័យ ខ្វះមុខ ខ្វះក្រោយ នៃគ្រួសារខ្មែរមួយនៅជនបទកម្ពុជាក្រោម នាស្រុក បាយឆៅ ខេត្តព្រះត្រពាំង មកដល់សហរដ្ឋអាមេរិកអាយុ១៧ឆ្នាំ ជាមួយបងប្អូនបីនាក់ ដែលមានវិបត្តិក្នុងគ្រួសារ សុបិន បានប្រឹងពុះពារគ្រប់ឧបសគ្គមានទាំងសុខភាពទាំងសេដ្ឋកិច្ចតែនៅសហរដ្ឋអាមេរិកនេះ ដៃនៃមនុស្សមានសប្បុរសធម៌ជាច្រើនបានយឹតយោងលើកទឹកចិត្ត សុបិន រហូតដល់ឆ្លងឧបសគ្គទាំងឡាយនោះរួច ។



មិនត្រឹមតែខិតខំក្នុងកិច្ចការងារសាកលវិទ្យាល័យ សុបិន បានរំលែកនៅពេលមកសិក្សាវិជ្ជាវប្បធម៌ខ្មែរប្រវត្តិសាស្ត្រ ជាពិសេសវិជ្ជាជាសាធារណៈទៀត នាពីឆ្នាំចុងក្រោយនេះ សុបិន បានធ្វើកិច្ចការងារក្នុងវិស័យផ្តល់ព័ត៌មានឱ្យសហគមន៍ខ្មែរនៅឆ្នេរខាងកើតនៃសហរដ្ឋអាមេរិកនេះ បានផ្តល់លទ្ធផលគួរឱ្យគោរព ។

ខ្មែរប៉ុស្តិ៍សូមកោតសរសើរ ហើយជូនពរឱ្យប្រកបជោគជ័យប្រសើរក្នុងជីវិត ៕

# ជូនពរដល់អ្នកព័ត៌មាន ស៊ីដន ប៊ូ

…ស៊ីដន ប៊ូ ជាបុរស ដ៏មានចំនួនតិចតួចនៅហ្វីឡាដែលហ្វីយ៉ា ដែលមានជំនាញបំរើ វិស័យព័ត៌មានជូនសហគមន៍ខ្មែរបាន ។ ស៊ីដន បានបំរើវិទ្យុសម្លេងខ្មែរ-អាមេរិកាំង នៅផែនស៊ីវេនានេះ ចំនួនបួនឆ្នាំថ្ងៃទី ១០ ឧសភា កន្លងទៅនេះ មិត្តភក្តិបានធ្វើពិធីជប់លៀងដ៏រីករាយមួយនៅសួនឧទ្យាន



Jenkintown ដើម្បីបង្ហាញភរិយាដ៏ស្រស់ច្រឡឹងឈ្មោះ ពុទ្ធិឡាវី ជាអ្នកគ្រូបង្រៀនសាលាធម្មតាផង និងជាគ្រូបង្រៀនអង់គ្លេសផង ។ បុរសរូបស្រស់សំដីបាននិយាយតិចសើចខ្លាំង ឥឡូវមិនហក់លោតបានដូចមុនទៀតឡើយ ។

កាលពីមកដល់អាមេរិក កាលពី២០ឆ្នាំមុន ស៊ីដន ពុំបានធ្វើអ្វីឱ្យបានច្បាស់លាស់ទេ រៀនក៏មិនបាន ដោយត្រូវប្រយុទ្ធស្លាប់រស់ជាមួយជំងឺរលាកក្រពះ និងរលាកស្រោមខួរក្បាល ។ ជំងឺដែលអស់សង្ឃឹមថា នឹងជួយស្រោចស្រង់ជីវិតបានបែរជាមកជាដាច់ស្រឡះ ដោយសារព្រះធម៌ ស៊ីដន បានទទួលការណែនាំឱ្យសម្មាធិវប្បសនាចំនួន១០ថ្ងៃ នៅមជ្ឈមណ្ឌល ហ្គោអិនកា ជម្ងឺរាំរ៉ៃក៏ជាសះរហូត ពីឆ្នាំ១៩៩៧ រហូតមកដល់សព្វថ្ងៃ ។ គឺចាប់ពីពេលនោះហើយដែល ស៊ីដន អាចទៅរៀនសូត្របាន រហូតដល់ទទួលបាន Associate Degree ខាងគ្រឿងយន្តរៀនធ្វើផ្ទះចុងបញ្ចប់ទៅរៀនវិជ្ជាសារព័ត៌មាន៦ខែ នៅវ៉ាស៊ីនតុនឌីស៊ី ដែលអនុញ្ញាតិឱ្យស៊ីដន ឆ្លៀតឱកាសបន្ទាប់ពីការងារជាងផ្ទះ ឬជាងឡានមកបញ្ចេញស្នាដៃជាអ្នកផ្សាយសម្លេងវិទ្យុសម្លេង ខ្មែរ-អាមេរិកាំងនៅហ្វីឡាដែលហ្វីយ៉ាបាន ។

ធ្វើការងារយ៉ាងស្វិតស្វាញសុច្ចរិត តែមិនទៀងទាត់ ដោយសារខ្វះលិខិតស្នាក់អាស្រ័យស្របច្បាប់រហូតដល់ឆ្នាំ ២០០៣ ទើប ស៊ីដន ទទួលដំណឹងតាមរយៈវិទ្យុខ្មែរអាមេរិកាំងថា ច្បាប់អនុញ្ញាតិឱ្យជនឥតច្បាប់អាចទៅសុំអន្តោប្រវេសន៍បាន ។ តែមួយឆ្នាំគត់ ស៊ីដន អាចទទួលសញ្ជាតិអាមេរិកាំងបានហើយ ក៏ស្វែងរកភាពនឹងហ្នឹងក្នុងការងារផង និងក្នុងជីវិតផង តាប់ជួន ស៊ីដន បានទទួលការណែនាំម្តងទៀត ឱ្យទៅជួយគ្រួសារខ្មែរអ្នកជនបទអ្នកស្លូតត្រង់នៅតាខ្មៅ ស៊ីដន ក៏បានជួបអ្នកគ្រូបន្ទូលចិត្ត ពុទ្ធិឡាវី ឆ្នាំ២០០៨ ។ ពុទ្ធិឡាវី មានចារិកជាអ្នករួសរាយនិយាយច្រើន ចេះគួរសមបានធ្វើឱ្យ ស៊ីដន បង្កើនការខិតខំលើការងារចិញ្ចឹមជីវិតយ៉ាងតឹងរឹងថែមទៀត ដោយគ្មានតួញត្អែ ដើម្បីអនាគតថ្មីថ្មោងរបស់ខ្លួន ។ ការងារនៅក្រៅផ្ទះជួបភ្ញៀវស្រីប្រុសច្រើនរបស់ ស៊ីដន ពុទ្ធិឡាវី និយាយថា "ខ្ញុំនឹងមិនបង្ហាត់ក្រពើឱ្យហែលទឹកទេ" ។

ខ្មែរប៉ុស្តិ៍ជូនពរមហាប្រសើរដល់គូរស្វាមីភរិយាអ្នក "ក្រសែត" ឱ្យទៅជាអ្នក "មានសែត" ឱ្យបានយ៉ាងឆាប់រហ័ស ៕

# តមកទំព័រទី ០១ ខ្មែរ_លាវធ្វើបុណ្យ...

លាវធ្វើបុណ្យចូលឆ្នាំថ្ងៃ ១៦ ឧសភា គឺ១ខែក្រោយថ្ងៃចូលឆ្នាំកំណត់ រីឯខ្មែរជួបជុំគ្នា ដើម្បីសម្ពោធកំណើតសមាគមពាណិជ្ជករខ្មែរ ផ្លូវលេខ៧។

ថ្វីត្បិតតែមានរូបរាង និងវប្បធមិស្រដៀងគ្នាតែសហគមន៍ទាំងពីរ ពុំដែលធ្វើអ្វីជារួមគ្នាទេ ។ រស់នៅលើដងផ្លូវលេខ៧ជាមួយគ្នាមានមុខរបរចំរុះគ្នាតែក្រុមនីមួយៗមានវត្តតែរៀងៗខ្លួន, ធ្វើពិធីជប់លៀងដាច់ពីគ្នា, ទៅរកអ្នកជួយណែនាំសង្គមកិច្ចខុសគ្នា ដូចជាលាវទៅរក " ស៊ី-ម៉ាក់ " ច្រើន រីឯខ្មែរទៅរក "សមាគមខ្មែរ " ឬ ក៏ទៅ "សមាគមព្រឹទ្ធាចារ្យ " ច្រើនទៅវិញ ។ សូម្បីតែនយោបាយក៏មិនទៅរកគ្នាដែរ ។

ថ្ងៃ ១៦ ឧសភា ឆ្នាំ ២០០៩ ចាប់តាំងពីម៉ោង ៩ព្រឹកទៅ ហាក់ដូចជាមានអ្វីកំពុងផ្លាស់ប្ដូរសហគមន៍ទាំងពីរមានតាំងលក់វត្ថុអនុស្សាវរីយ៍មានតាំងម្ហូបអាហារកញ្ចប់សម្រាប់បរិ-ភោគភ្លាមៗ ឬសម្រាប់ទុកយូរថ្ងៃមានលក់សាច់អាំង ឬកន្ទំ ឬត្រុំ បន្តគ្នាតាមផ្លូវ ពុំអាចនរណាទាយបានថា អ្នកណាជាខ្មែរ ឬក៏ជាលាវបានឡើយ ។



គេរលាក់ដៃគ្នាមានទឹកមុខរីករាយលូកទិញ សាច់អាំងទៅវិញទៅមកនិយាយចំអន់គ្នាទៅវិញទៅមក ហើយជាពិសេសគេអបអរសាទរការសំដែងសិល្បៈ ភ្លេងរបាំ ទាំងពីរខាងហាក់ ដូចជាចង់រំលឹកនូវមិត្តភាពនៃការទទួលរងនូវទារុណកម្មពីរបបកុម្មុយនិស្តដូចគ្នា ។





គេតែងឮពាក្យថា " លាវចូលចិត្តសប្បាយ " រីឯ "ខ្មែរចូលចិត្តឆាប់ខឹង " តែថ្ងៃទី ១៦ នោះ ទាំងកុមារាកុមារី ទាំងយុវជន យុវចាស់ យុវទុំ ភាពរីករាយស្រឡាញ់រាប់អានគ្នាបានបង្ហាញយ៉ាង ច្បាស់ គេសង្ឃឹមថា អ្នកទាំងនោះនឹងពួតដៃគ្នាបង្កើនសោភ័ណ្ឌភាព និងអំណាចនៃសហគមន៍រៀងៗខ្លួននៅក្នុងតំបន់នៃជីវភាពរបស់ខ្លួនជាមិនខាន ៕

# បោះឆ្នោតនៅក្រុងហ្វីឡាដែលហ្វៀ

ដោយ : ពិន សំខុន

●●●សហគមន៍ខ្មែរ តំណាងឱ្យក្រុមអតីតយុទ្ធជនស្ម័គ្រចិត្តរួមគ្នានឹងសហគមន៍អាមេរិកាំង, វៀតណាម, ចិន បានចូលរួមយ៉ាងសកម្មក្នុងព្រឹត្តិការណ៍នយោបាយ កាលពីថ្ងៃទី ១៩ ឧសភា ២០០៩ កន្លងមកនេះ ដោយអ្នកទាំងនោះ បានស្ម័គ្រចិត្តទៅឃោសនាគាំទ្របេក្ខជននយោបាយ ដើម្បីឱ្យពលរដ្ឋក្នុងតំបន់ដែលមានជនជាតិអាស៊ីច្រើនរស់នៅឱ្យចេញមកបោះឆ្នោត ។





គឺជាការបោះឆ្នោតជុំទី១ ដើម្បីជ្រើសរើស យកបេក្ខជនម្នាក់ខាងគណបក្សប្រជាធិបតេយ្យ និងម្នាក់ទៀត ខាងគណបក្សសាធារណរដ្ឋ ឱ្យមកឈរជាបេក្ខជនសម្រាប់ តួនាទីគណរដ្ឋ-អាជ្ញាសម្រាប់ហ្វីដែលឡាហ្វីយ៉ា ។

រាត្រីទី ១៩ ឧសភានោះ លោក សរិត ប៉ែន , លោក ជន សានី សុខ ដែលបានធ្វើ សកម្មភាពចែកខិតប័ណ្ណពេញមួយថ្ងៃ សំដែងការទើបហត់នៅរង់ចាំអ៊ុតលទ្ធផលអ្នកឈ្នះ នៅម៉ោងដប់យប់ នាភោជនីយដ្ឋានអាស៊ីមួយ នៅជ្រុងផ្លូវ វ៉ាស៊ិនតោន និង ១១ តែអ្នកទាំងពីរួមគ្នានឹង លោក ម៉ារិន ថាច់ ម្នាក់ទៀត នៅសប្បាយចិត្ត ដោយបានទទួលដំណឹងក្រៅផ្លូវការថា បេក្ខជនដែលខ្លួនបានគាំទ្រនោះ បានសន្លឹកឆ្នោតច្រើនជាងគេ ។

នាមុនប្រកាសលទ្ធផល បណ្ឌិត Lan Nguyen ជាអ្នកគាំទ្របេក្ខជនដដែល បានទស្សន៍ទាយថា Seth Williams ជាបេក្ខជនទី១ បន្ទាប់មក មានឈ្មោះ Mc Caffery ជាទី២ រហូតដល់ទី៤ រីឯលទ្ធផល សម្រាប់គណបក្សប្រជាធិបតេយ្យ ចេញដូច Lan ទាយទុកមែន នេះដោយសារជនជាតិវៀតណាមម្នាក់នេះបានស្គាល់គន្លឹះនយោបាយនៅក្រុងមួយនេះបានច្រើនឆ្នាំ ។សម្លេងហោកញ្ជៀវទទួលស្គាល់ជ័យជំនះ Seth William បានផ្ទុះឡើងក្នុងរង្វង់អ្នកគាំទ្រប្រមាណ ២០នាក់ ដែលនៅទីនោះ ។

នៅខែតុលាខាងមុខ Seth William គណបក្សប្រជា-ធិបតេយ្យ នឹងជួបប្រឈមមុខ Micheal Untermayer គណបក្សសាធារណ រដ្ឋ ក្នុងតួនាទី District Attorney ។ ម្នាក់ទៀត Alan Burkovitz ខាងប្រជាធិបតេយ្យ HE Schmidt ខាងសាធារណរដ្ឋ ក្នុងតួនាទី City Controler ៕

## បុណ្យផ្កាសាមគ្គីឧបត្ថម្ភកងទ័ពខ្មែរ ការពារព្រំដែន

សមាជិកសមាជិការស្ម័គ្រចិត្តយើងខ្ញុំសូមជំរាបសួរ និងសូមគោរពអញ្ជើញបងប្អូនរួមជាតិខ្មែរទាំងអស់ចូលរួមពិធីបុណ្យផ្ការស្មីសាមគ្គី មួយ ក្នុងគោលបំណងស្វែងរកការរួបរួមសាមគ្គីគ្នា និងរៃអង្គាសបច្ច័យឧបត្ថម្ភគាំទ្រកងទ័ព បងប្អូនខ្មែរ ដែលកំពុងរងគ្រោះដោយសារការឈ្លានពានព្រំដែនខុសច្បាប់ពីសំណាក់កងទ័ពថៃ ។ ក្រុមស្ម័គ្រចិត្តយើងខ្ញុំបានប្រារព្ធពិធីបុណ្យនេះ មិនយកកំរៃ យកផលប្រយោជន៍ និងបំរើគណបក្សនយោបាយណាមួយឡើយ គឺយើងធ្វើឡើង ដើម្បីបូរណភាពដែនដីខ្មែរយើងទាំងអស់គ្នា ។

យើងខ្ញុំសង្ឃឹមជឿជាក់ថា បងប្អូនជនរួមជាតិខ្មែរយើងទាំងអស់គ្នាពិតជាចំណាយពេលដ៏មានតំលៃមកចូលរួមបុណ្យផ្កាសាមគ្គីនេះ កុំបីអាក់-ខានឡើយ ។

ទីកន្លែងបុណ្យវត្តខ្មែរបាលេល័យ ។ ដីធំថ្មីដែលមានអាស័យដ្ឋាន : 2701 S.58th St, Phila, PA 19143

**កាលបរិច្ឆេទ :** ថ្ងៃទី២៥ ខែតុលា ឆ្នាំ២០០៩ ម៉ោង ៩:០០ ព្រឹក ដល់ ៦:០០ ល្ងាច ។

**កម្មវិធីបុណ្យ :** ម៉ោង ១០:០០ ព្រឹក និមន្តព្រះសង្ឃសូត្រមន្ត និង ប្រគេនចង្ហាន ។

ម៉ោង១២:០០ ភ្ញៀវកិត្តិយសទទួលទានអាហារកំដរដោយវង់ភ្លេងតូរតន្ត្រីកំសាន្តផងដែរ ។

**បន្ថែម :** បើមានសំណួរឯមានសទ្ធាជ្រះថ្លា បរិច្ចាគថវិកា សូមទាក់ទងយើងខ្ញុំដូចមានរាយនាមដូចខាងក្រោម :

ចាន់ ហម ២១៥ ៩២៧ ៦៩០១ , សូត្រ ហ៊ូ ២៦៧ ២៤៣ ២៤២៣
ប៊ិច វិសាខា ២៦៧ ៩០១៨៩៩២ ,មាស ជា ២១៥ ៨៣៣ ៣៦៦៩
ញ៉យ ចំរើន ២៦៧ ២២៦ ៧៨៦១ , សេង ២៦៧ ២៣៥ ៧៩៩៥
រស់ អាឡេច ២៦៧-៥៧០-៧៤៤៩ ៕

តមកពីទំព័រទី ០៤

# បទសម្ភាសន៍ក្នុងសន្និសីទ...

នៅអាមេរិក នៅយូរ៉ុប មាន អាឡឺម៉ង់ បារាំង អ៊ីតាលី...។ល។ គឺយើងបាន ធ្វើមហាបាតុកម្ម ជាប្រវត្តិសាស្ត្រ កាលពីថ្ងៃទី៨ ឧសភា កន្លងមកនេះ នៅទីក្រុង ហ្សឺណែវ មានមនុស្សប្រមាណ ៥០០នាក់ចូលរួម ដែលនេះជាស្មារតីចេះជួយគ្នារវាងខ្មែរ និងខ្មែរក្រោម ហើយទីពីរ គណៈកម្មការយុវជនខ្មែរ និងខ្មែរក្រោម បានសម្រេចការងារដ៏សំខាន់រួមគ្នាមួយទៀត ដោយបានសរសេរញត្តិពីថ្ងៃទី ៨ ដល់ ១៩ ឧសភា ហ្នឹង ។ រឿងចុងក្រោយ គឺយើងបានសម្រេចចិត្តធ្វើទិវាមួយដែលមានឈ្មោះថា " ទិវាកម្ពុជាក្រោម " នៅថ្ងៃខួបទី ៦០ ដែលកម្ពុជា បានត្រូវបារាំងចុះហត្ថលេខាថ្ងៃទី៤ មិថុនា ១៩៤៩ ប្រគល់កម្ពុជាក្រោមទៅឱ្យយួន មិនប្រគល់មកខ្មែរវិញទេ ដែលសំខាន់នោះ យើងនឹងធ្វើនៅប្រទេសបារាំង នាទីក្រុងប៉ារីស ដែលជាទីនៃអ្នកសន្យារឿងសន្យទុក្ខឱ្យខ្មែរ ហើយនៅពេលនោះ នឹងមានសភាយូរ៉ុប ដូចជាលោក MARCO នៅ ITALY លោកថា នឹងមក ហើយហៅសភាប្រទេសផ្សេងៗទៀតឱ្យចូលរួមផង ដូច្នេះនេះ ក៏ជាការសម្រេចផែនការបីខែរបស់សហព័ន្ធ ដើម្បីប្រវត្តិសាស្ត្រខ្មែរក្រោម. ដើម្បីវប្បធម៌ អក្សរសាស្ត្រខ្មែរក្រោម ដែលយួនខំបំបាត់ពីពិភពលោក ។

**សុបិន ថាច់** : ស្តាប់ទៅលោកកំពុងជួយយុវជន និងខ្មែរក្រោមយ៉ាងពេញទំហឹងនៅលើពិភពលោក តើលោកនឹងជួយយុវជននៅស្រុកយួន និងនៅស្រុកខ្មែរ ដែលកំពុងតែបាត់បង់អត្តសញ្ញាណនោះរបៀបណា ?

**ថាច់ងុកថាច់** : ដំណើររបស់សហព័ន្ធខ្មែរកម្ពុជាក្រោម គឺមានចក្ខុវិស័យមួយ ដែលមានឈ្មោះថា " ដំណើរឆ្ពោះទៅកាន់មាតុភូមិ " គឺ១ ដំណាក់កាលនៅអន្តរជាតិ ទី២- ដំណាក់កាលនៅកម្ពុជា ទី៣- ដំណាក់កាលនៅកម្ពុជាក្រោម។ នៅដំណាក់កាលទី១ ថ្វីត្បិតតែខ្មែរធ្លាប់ច្បាំងជាមួយបារាំង, ជាមួយជប៉ុន, ជាមួយអាមេរិកាំង អ្វីជាដើម គេភ្លេចអស់ហើយ ពីវត្តមានរបស់ខ្មែរក្រោម ពីព្រោះទឹកដីនោះ បានក្លាយទៅជារបស់យួន. យើងកំពុងខិតខំឱ្យគេដឹងឡើងវិញ នៅដំណាក់ការណ៍អន្តរជាតិ ឱ្យគេដឹងថា មានខ្មែរជាច្រើនរស់នៅលើទឹកដីនាទីនោះនៅឡើយ. ខ្ញុំ ចង់ឱ្យបងប្អូនខ្មែរដឹង ហើយបើដឹងនោះ នោះទឹកចិត្តស្នេហាជាតិ និងទឹកដីនឹងរះឡើងមកវិញ ហើយជាចុងក្រោយ គឺខ្ញុំចង់ឃើញបងប្អូនខ្មែរនៅទឹកដីខាងក្រោមនោះ មានជីវភាពប្រសើរ មានការទ្រទ្រង់វត្តអារ៉ាមបាន ហើយជាពិសេសទ្រទ្រង់ជីវភាពគ្រួសារ ឱ្យកូនចៅទៅរៀនសូត្របានសេរីភាព និងអ្នកឯទៀតបាននៅសហរដ្ឋអាមេរិកនេះ គេទទួលសិស្សពីស្រុកយួន ឱ្យមករៀន ៧-៨ពាន់នាក់ កូនខ្មែរមានតែបីបួននាក់ ហើយមិនហ៊ាននិយាយថា កូនខ្មែរទៀត- រីឯនៅអូស្ត្រាលី ឆ្នាំទៅមានកូនសិស្សបញ្ជូនឱ្យទៅរៀនប្រមាណ ៤០០០មាក់ គ្មានកូនខ្មែរក្រោមម្នាក់ទេ- ខ្ញុំចង់ឃើញបងប្អូនខ្មែរក្រោមមានសេរីភាពគ្រប់គ្រាន់ក្នុងការរស់នៅ និងការធ្វើដំណើរទៅជិតឆ្ងាយ - ដូច្នេះសូមអ្នកសារព័ត៌មានជួយផ្សាយទៅដល់បងប្អូនខ្មែរ និងយុវជនខ្មែរឱ្យចូលរួម នេះពុំមែនជាការធ្វើនយោបាយអ្វីទេ- យើងចេះជួយគ្នា សាមគ្គី នោះព្រលឹងជាតិ នឹងកើតឡើង ហើយបើគ្មាន ព្រលឹងជាតិ គឺនឹង គ្មានការងាយស្រួលឱ្យយួន-សៀម-លាវ យកទឹកដីយើងបាន ។

**សុបិន ថាច់** : សូមអរគុណ លោក ថាច់ងុក ថាច់ ។

**3-ព្រះតេជគុណ បញ្ញាបជន្តោ ថាច់ ប៊ុឺង :** វត្តពុទ្ធិខ្មែរក្រោម " ខេមរារង្សី " នៅ San Jose ទទួលបន្ទុកខាងព័ត៌មាន និងកិច្ចការអន្តរសាសនា របស់ " សហព័ន្ធ " សួរដោយ សុបិន ថាច់ :

**សុបិន ថាច់** : នាងខ្ញុំព្រះករុណា ទើបនឹងធ្វើបតសម្ភាសន៍សមាជិក " សហព័ន្ធ " ពីរនាក់ ហើយបាននិយាយពីពាក្យជោគជ័យនៃការទទួលសិទ្ធិពី អ.ស.ប ថាជាម្ចាស់នៃទឹកដីកំណើរ "INDIGENOUS " នៅវៀតណាម តើព្រះអង្គអាចពន្យល់ពីអត្ថន័យនៃពាក្យនេះបានទេ ?

**ព្រះអង្គថាច់ប៊ុឺង** : អ.ស.ប បានសម្រេចច្បាប់មួយ មាន៤៦មាត្រា អនុញ្ញាតិឱ្យជនជាតិពិភពលោកប្រមាណជិត ៤០០លាននាក់ ក្នុងនោះមានខ្មែរប្រមាណ៨លាននាក់ ដែលរស់នៅវៀតណាមសព្វថ្ងៃ មានសិទ្ធិប្រតិបត្តិតាមព្រះពុទ្ធសាសនា ឬក៏អាចជាម្ចាស់នៃស្រែចំការ ទឹកដី រីឯស្ត្រីកុមារ ក៏អាចមានសិទ្ធិស្មើគ្នា ដូចជាមនុស្សនៃប្រជាជាតិដ៏ទៃទៀតចំនួន ១៩៣ប្រទេសដែរ ។

**សុបិន ថាច់** : មុនពេលបើកបទសម្ភាសន៍នេះ ព្រះអង្គមានពុទ្ធដីការថា ព្រះអង្គបាននិមន្តទៅប្រទេសថៃ គឺព្រះអង្គបាននិមន្តទៅធ្វើអ្វីដែរ ?

**ព្រះអង្គថាច់ប៊ុឺង** : ព្រះអង្គខ្មែរក្រោមយើង៥អង្គបានទទួលការនិមន្តជាផ្លូវការពីអង្គការព្រះពុទ្ធសាសនាថេរវាទ " ឧត្តមក្រុម

**តទៅទំព័រទី១៦**

នាទី ប្រវត្តិសាស្ត្រ

# ទំព័រហើឡាដែលហើយ៉ា

## ពីរដ្ឋបាលកុលសម្ព័ន្ធមករដ្ឋាភិបាលសម័យ

**ដោយ : ពិនសំខុន** ***តពីលេខមុន***

**១៩ កុម្ភៈ** : ទទួលជំនួសសាជាថ្មី ខាងសេដ្ឋកិច្ច និងយោធាពីសហរដ្ឋអាមេរិក ។

**២៥ កុម្ភៈ** : ពួកឧទ្ទាមវាយប្រហារខេត្ត ៦ ផ្ទួនៗគ្នា : បាត់ដំបូង, កំពុងឆ្នាំង, កំពុងស្ពឺ, តាកែវ, កំពត, កោះកុង អ្នកភូមិប្រមាណ១ម៉ឺននាក់ ចុះចូលខាងពួកឧទ្ទាម ។

**១៣ ឧសភា** : លន់ នល់ បានចូលរួមក្នុងរដ្ឋាភិបាល ជារដ្ឋមន្ត្រីក្រសួងការពារជាតិ និងជាអគ្គស្នងការនៃកងទ័ពជាតិ ។

**២៥ កក្កដា** : សមាជទី២៥ របស់សង្គមរាស្ត្រនិយម ។

**២៩ តុលា** : សម្ពោធអាកាសយានដ្ឋាន បែកចាន នៅបាត់ដំបង ។

**៣១ តុលា** : សម្ពោធសាកលវិទ្យាល័យបាត់ដំបង ។

**៥ ធ្នូ** : លន់ នល់ កាន់តំណែងជានាយករដ្ឋមន្ត្រី ។

**១៩៦៩**

**២ មករា** : សម្តេច សីហនុ បានផ្តើមទិទានពីវត្តមានយួន វៀតកុង នៅលើទឹកដីកម្ពុជា ជាលើកដំបូងបង្អស់ ។

**៩ មីនា** : យន្តហោះ B 52 អាមេរិកាំងទម្លាក់គ្រាប់បែកលើទឹកដីកម្ពុជា ។

**១៨ មីនា** : ផ្តើមទម្លាក់គ្រាប់បែកដោយលួចលាក់ ដោយយន្តហោះអាមេរិកាំងលើកម្ពុជា ចំនួន ១៤ខែ គេដាក់ឈ្មោះបេសកកម្មឈ្មោះ "មេញូ" រដ្ឋបាលលោកប្រធានាធិបតី "និកសុន" បានក្លែងបន្លំឯកសារ លាក់ដំណឹងពីសាធារណជន និងពីសភា ។

**២៥ មីនា** : មូលដ្ឋាន រមាសហែក នៅស្វាយរៀង បានត្រូវក្រុមខ្មែរកុម្មុយនិស្ត ប្រមាណ៦០នាក់វាយលុក ។

**២៩ មីនា** : សម្តេច សីហនុ បង្ហាញផែនទីលំអិតពីជម្រកយួន យៀកមិញ និងវៀតកុង ។

**១១ មេសា** : កម្ពុជា និងសហរដ្ឋអាមេរិក ចងសំណងការទូតឡើងវិញ ។

**ពី ១៤ មេសា ដល់ ១២ ឧសភា** : យន្តហោះយោធាអាមេរិកាំង ទម្លាក់ថ្នាំពុលជម្រុះស្លឹកឈើលើតំបន់មេមត់ និងពញាក្រែង ខេត្តកំពុងចាម ។

**២៦ មេសា** : កងខេមរភូមិន្ទ វាយលុកភូមិដ្ឋានខ្មែរកុម្មុយនិស្តវិញនៅរតនគីរី ។

**១១ មិថុនា** : ខ្មែរប្រកាសចំណងទូតជាផ្លូវការជាមួយសហរដ្ឋអាមេរិក តែថ្ងៃជាមួយគ្នានោះ អាល្លឺម៉ាញខាងលិច បានផ្តាច់ទូតជាមួយកម្ពុជា ដែលទើបនឹងភ្ជាប់ចំណងទូតជាមួយអាល្លឺម៉ាញខាងកើត ។

**១៣ មិថុនា** : ខ្មែរទទួលស្គាល់រដ្ឋាភិបាលរំដោះវៀតណាម បង្កើតឡើងដោយចលនាវៀតកុង ។

**២៨ កក្កដា** : កម្ពុជាបានទទួលជាសមាជិក Fonds Monetaire International.

**៣០ កក្កដា** : ឧត្តមសេនីយ៍ទោ ញឹក ជូឡុង បានផ្ទេរតំណែងជាអគ្គមេបញ្ជាការកងខេមរភូមិន្ទ ឱ្យទៅឧត្តមសេនីយ៍ លន់ នល់ ។

**១ សីហា** : រដ្ឋាភិបាល លោក ប៉ែន នុត លាលែង ។

**(តទៅលេខក្រោយ)**

# ពុទ្ធប្បវត្តិអមដោយរូបភាព

## A Pictorrial Biography of Saky amuni Buddha

**ដោយ : អ៊ឹម ឈឿម**

**(តពីលេខមុន)**

❖រូបភាព និងរឿងដើមជាភាសាថៃដោយ គុណាប៉ាយុតា

❖បកប្រែជាភាសាចិន ដោយ ភិក្ខុ ជែន ហាយ

❖បកប្រែជាភាសាអង់គ្លេស ដោយ ហ្សិត .អេ.លី

❖ផាត់ពណ៌ដោយ យ៉ាន់ ហ្វាលី

❖បកប្រែជាភាសាខ្មែរ ដោយភិក្ខុ គង់ អាំ

❖Original Illuatration and Naration in Thai by Gunapayuta.

❖Translation into Chinese by Bhikkhu Jan Hai.

❖Translation into English by Z.A Lu.

❖ Coloring by Yann-Fang Lee

❖Translation into Khmer by Bhikkhu Kong Am.

**២៦-** នៅថ្ងៃដែលពួកមន្ត្រីបានមកប្រជុំគ្នាដើម្បីនឹងពិភាក្សាបញ្ហាផ្សេងៗ ក៏មានបញ្ហាជម្លោះដ៏ធំមួយអំពីរឿងសត្វកុក្កានផងដែរ ។ មន្ត្រីទាំងឡាយមានយោបល់ផ្សេងៗគ្នា ចំពោះរឿងនេះ ។ ពួកមន្ត្រីខ្លះនិយាយថា សត្វនេះគួរតែបានទៅព្រះសិទ្ធត្ថ ព្រោះព្រះអង្គទ្រង់បានសង្គ្រោះជីវិតវា ។ តែមន្ត្រីមួយចំនួនទៀត អះអាងថា កុមារទេវទត្តទេ ដែលគួរតែបានសត្វនេះ ពីព្រោះព្រះអង្គបានបាញ់វា ។ មន្ត្រីម្នាក់ៗចេះតែលើកហេតុផលឡើង តាមតែទស្សនៈរៀងៗខ្លួន ។

**២៧-** ចុងបញ្ចប់នៅការប្រជុំនោះ មន្ត្រីវ័យក្មេងម្នាក់ក្រោកឈរឡើង ពោលអះអាងខ្លះៗថា សត្វដែលមានជីវិតទាំងឡាយត្រូវតែបានទៅអ្នកដែលសង្គ្រោះស្រោចស្រង់ ឬការពារជីវិតមិនត្រូវបានទៅអ្នកដែលបំផ្លិចផ្លាញជីវិតវាទេ ។ មែនពិតសត្វដែលដល់ចន្ទូវរបួសដ៏ធ្ងន់នេះត្រូវតែបានទៅអ្នកសង្គ្រោះវា គឺអង្គព្រះសិទ្ធត្ថកុមារ ! " ។

**(តទៅលេខក្រោយ)**

**26-** On the day when the scholars were to gather and confer on varioun matters, there was plenty of dispute about the problem of the swam. They all had different opinions. Same said the bird should belong to Prince Siddhartha because he had saved it´s life. Some , on the contrary. believed that Prince Devadatta should have the bird because he had brougt it down. Everyone seemed to have his own reason for choosing one point of view or another .

**27-** Finally, a young scaholar stood up, loudly proclaiming, " all living creatures belong to those who save or guard their lives, not to those who damage their live. In face, this wounded bird shall belong to its savior, that is, to Prince Siddhartha ! "

**(continue Issue After)**



# ៧ថ្ងៃ ឱ្យស្បែកភ្លឺរលោងជំរះជាតិពុល

●●● ការលាងជំរះជាតិពុលក្នុងថ្ងៃដំបូងនឹងចាប់ផ្តើមឡើងក្នុងការអត់អាហារប្រចាំពេលទទួលទានតែទឹកផ្លែឈើ និងផ្លែឈើតែប៉ុណ្ណោះ ។ បន្ទាប់ពីនោះ ថ្ងៃដែលនៅសេសសល់ និងសង្កត់ធ្ងន់ទៅលើការទទួលទានបន្លែផ្លែឈើស្រស់ៗ ធញ្ញជាតិ ស៊ុត ត្រី និងប្រេងដែលមានគុណភាព ដូចជាប្រេងម្នាក់ ។ ក្នុងអំឡុងពេលដែលអ្នកលាងជាតិពុលនេះសូមឱ្យអ្នកផ្អាកកាហ្វេ និងគ្រឿងញៀនជាដាច់ខាត ។ ក៏ប៉ុន្តែបន្ទាប់ពីថ្ងៃទីដំបូង អ្នកអាចទទួលទានទឹកតែខ្ចីដាក់ក្រូចឆ្មារ នំប៉័ងលាបប៊ឺរ ដំឡូងបារាំងបំពង បបរអង្ករសំរូបបានបន្តិចបន្តួច ។ ក្រៅពីនេះនៅក្នុងចន្លោះ2-3ថ្ងៃដំបូង អ្នកនឹងមានឧស្ម័ននៅក្នុងក្រពះអាហារឬក៏រោគ ។ ប៉ុន្តែនៅពេលលាងជាតិពុលរួចហើយប្រព័ន្ធរំលាយអាហារនិងធម្មតាថែមទាំងស្បែកស្អាតភ្លឺរលោង និងបានស្រកទម្ងន់ទៀតផង ។

**អាហារថ្ងៃទី១ :**

**ពេលព្រឹក :** ទឹកក្រឡុកទំពាំងបាយជូរលាយជាមួយទឹក ផ្លែប៉ោមក្រឡុកកន្លះកែវ ទឹកឃ្មុំមួយស្លាបព្រាបាយ និងទំពាំងបាយជូរជាមួយផ្លែប៉ោមស្រស់ ។

**ពេលថ្ងៃ :** ទឹកទំពាំងបាយជូរលាយជាមួយទឹកក្រូចឆ្មារ ជាមួយនិងទំពាំងបាយជូរស្រស់ ។

**ពេលថ្ងៃត្រង់ :** ទឹកបន្លែជាមួយនិងទឹកក្រូចឆ្មារ ក្រឡុក ផ្លែឈើក្រៀមដោយត្រាំទឹកទុកចោលមួយយប់ ។

**ពេលរសៀល :** ទឹកផ្លែប៉ោម

**ពេលល្ងាច :** បន្លែជាមួយនិងរូបមន្តបន្លែពិសេសធ្វើដោយខ្លួនឯង ដោយប្រើប្រេងម្នាក់ ទឹកក្រូចឆ្មារ អំបិល ខ្ទឹម និងរុក្ខជាតិថ្នាំបុរាណដទៃៗទៀត ។

**អាហារថ្ងៃទី២ :** ដូចជាថ្ងៃទី១ ក៏ប៉ុន្តែពេលល្ងាចប្តូរ ទៅជាបន្លែសេឡឺរី បន្លែស្ពៃ រំលង់ណាត់ ដំឡូងបារាំងចំហុយ សណ្តែក ដោយមិនដាក់ស្ករ ។

**អាហារថ្ងៃទី៣ :**

**ពេលព្រឹក :** ស្រូវអ្នូត២ស្លាបព្រាបាយត្រាំទឹកទុកចោល១យប់ បន្ទាប់មកថែមប្រេងដូងមួយស្លាបព្រាបាយ ទឹកសណ្តែកលឿងមួយស្លាបព្រា និងហាន់ចេកអំបូងតូចមួយលាយជាចុងក្រោយ ។

**ពេលថ្ងៃ :** ទឹកបន្លែស្រស់ក្រឡុក

**ពេលថ្ងៃត្រង់ :** បន្លែស្ពៃក្តោបសាប់ មើមការ៉ុត ម្ទេសដៃនាង មើមខ្ទឹមបារាំង ប្រើទឹកសាលាដ រូបមន្តពិសេសរោយដោយបន្លែជីរបារាំង និងល្ងទទួលទានត្រីធូណា ម៉ាក់ខឺរ៉ែល ឬក៏សារឌីនកំប៉ុងតាមក្រោយដោយផ្លែឈើដូចជាទំពាំងបាយជូរ ស្ត្របឺរី និងផ្លែប៉ោម ។

**ពេលរសៀល :** សេឡឺរី ការ៉ុត ស្ពៃក្តោប ខ្ទឹមបារាំងនាំយកទៅស្ងោរជាមួយ និងអង្ករសំរូបបន្ថែមរសជាតិដោយម្រេចខ្មៅនិងរោយដោយជីរបារាំង ។

**អាហាថ្ងៃទី៤**

**ពេលព្រឹក :** ទំពាំងបាយជូរ ផ្លែប៉ោម ស៊ុតស្ងោរ ឬក៏ស៊ុតថែមប៊ឺរ បន្តិចបន្តួច ។

**ពេលថ្ងៃ :** ទឹកការ៉ុត សេឡឺរីន និងផ្លែប៉ោមក្រឡុករួមគ្នា ឬក៏ទឹកប៉េងប៉ោះក្រឡុកដាក់ទឹកក្រូចឆ្មារ ។

**ពេលថ្ងៃត្រង់ :** ស៊ុបដោយមានសាច់ថ្ងៃទី៣ ជាមួយ និងនំប៉័ង ហូលវ៉ិត និងបន្លែបន្តិចបន្តួច ។

**ពេលល្ងាច :** ត្រីអាំង ឬក៏មាន់អាំងទទួលទានជាមួយបន្លែស្ពៃក្តោបពីប្រ៊ុកគូលី ថែមប៊ឺរ សណ្តែក និងទឹកក្រូចឆ្មារ ព្រមទាំងលាងមាត់តាមក្រោយដោយផ្លែឈើ ឬទឹកដោះគោជូរ ។

**អាហារថ្ងៃទី៥ :**

**ពេលព្រឹក :** ដូចថ្ងៃទី៣

**ពេលថ្ងៃ :** ទឹកបន្លែក្រឡុក

**ពេលថ្ងៃត្រង់ :** អាហារដែលមានបន្លែស្រស់រោយមុខ

**ពេលរសៀល :** ទឹកផ្លែឈើ ឬក៏ទឹកបន្លែ ក្រឡុក ឬក៏ទឹកតែ

**ពេលល្ងាច :** បន្លែស្រស់ដាក់ល្ងលីងគ្រាប់ឈូករ័ត្ន មាន់ចំហុយទឹកឃ្មុំ អាល់-ម៉ន ទឹកដោះគោជូររសជាតិធម្មជាតិគួរឱ្យចូលគ្នា ។

**អាហារថ្ងៃទី៦ :**

**ពេលព្រឹក :** ផ្លែឈើដូចជាប៉ោមក្រូច ទំពាំងបាយជូរ ស្ត្របឺរីលាយជាមួយទឹកដោះគោជូរ និងទឹកឃ្មុំ

**ពេលថ្ងៃ :** ទឹកបន្លែក្រឡុក

**ពេលថ្ងៃត្រង់ :** ដំឡូងបារាំងចំហុយស៊ុតចៀន បន្លែស្រស់ និងផ្លែឈើ

**ពេលល្ងាច :** បាយអង្ករសំរូបទទួលទានជាមួយសម្លប្រហើរផ្សិតចំប៉ើងសារាយបុកទឹកគ្រឿងផ្ទាប់ជាមួយបន្លែស្រស់ និងទទួលក្នុងក្រោយចុង ក្រោយដោយផ្លែឈើស្រស់ ។

**អាហារថ្ងៃទី៧ :**

**ពេលព្រឹក :** បបរអង្ករសំរូប១កូនចានទទួលទានជាមួយនិងទឹកធម្មតា ។

**ពេលថ្ងៃ :** ទឹកក្រូចឆ្មារដាក់ទឹកឃ្មុំ

**ពេលថ្ងៃត្រង់ :** បន្លែ និងផ្លែឈើ

**ពេលរសៀល :** បន្លែស្រស់

**ពេលល្ងាច :** បាយអង្ករសំរូបមួយកូនចានជាមួយនិងមាន់អាំងស្ងោរស្លឹកបាស់ ឆាបន្លែត្រកួន និងផ្លែឈើស្រស់ ៕

# ភេសជ្ជៈសំខាន់បំផុត សំរាប់សុខភាពពេលព្រឹក




**❖❖❖ ជាការពិតណាស់ មានមនុស្សជាច្រើននាក់ ក្រោយពេលក្រោកពីដំណេកនៅពេលព្រឹកភ្លាម ក៏មានអាការរសេះរសោះអស់កម្លាំងល្អិតល្ហៃ រួមទាំងអារម្មណ៍ធុញថប់មិនស្រឡះ នៅក្នុងខ្លួនទាល់តែសោះ ។ បញ្ហានេះមានមូលហេតុជាច្រើនប្រការ ជួនកាលអាចបណ្តាលមកពីការ ចូលដំណេកយប់ជ្រៅពេក ឬក៏អាចមកពីអាការឈឺថ្កាត់ទាំងផ្លូវកាយ និងផ្លូវចិត្ត ។ លក្ខណៈបែបនេះ អាចធ្វើឱ្យព្រឹកនៃថ្ងៃថ្មីរបស់លោកអ្នកពោរពេញទៅដោយភាពស្រពាប់ស្រពោនបាន ។ ក៏ប៉ុន្តែប្រសិនបើអ្នកចង់ឱ្យភាពស្រស់ស្រាយនៃថ្ងៃថ្មីវិលត្រឡប់មកវិញនោះ ចូរសាកល្បងធ្វើតាមការណែនាំដូចខាងក្រោមនេះ :**

●**ទឹកខ្ចី :** សំរាប់អ្នកដែលមាន អាការរមួលរកកល ចង់ក្អួត មិនថាមានមូលហេតុមកពីសំរាកមិនបានគ្រប់គ្រាន់ក៏ដោយចុះ យើងសូមណែនាំឱ្យអ្នកទទួលទានទឹកខ្ញីក្តៅ ព្រោះនៅក្នុងមើមខ្ញីមានសារជាតិគីមីម្យ៉ាងដែលហៅថា ជីន- ជីរ៉ល ។ វាជាសារជាតិគីមីប្រភេទប្រេងក្រអូបផ្តល់ឱ្យទាំងរសជាតិ និងក្លិនពិសេសមិនដូចគេ ដែលអាចចាត់ទុកក្នុងក្រុមអាល់កុល តែមិនធ្វើឱ្យស្រវឹង ហើយថែមទាំងជាឱសថជួយបន្សាបជាតិស្រវឹងបានយ៉ាងល្អទៀតផង ។

វិធីធ្វើទឹកខ្ញីឱ្យមានរសជាតិឆ្ងាញ់វិញនោះ ណែនាំឱ្យប្រើមើមខ្ញីដែលមិនចាស់ពេក ដោយយកមើមខ្ញីមកដំឱ្យទក់ រួចដាក់ស្ងោរមួយពុះប្រញាប់លើកចេញដើម្បីការពារការបាត់រសជាតិ និងក្លិន ។ អ្នកអាចផ្អឹហុតទទួលទានដោយទទេ ឬអាចបន្ថែមស្ករសបន្តិចក៏បាន ។

**ទឹកសៅ៊ :** សំរាប់អ្នកចូលដំណេកយប់ជ្រៅ ភាគច្រើននៅពេលព្រឹកច្រើនកើតមានអាការឈឺក្បាលធីង-ធោង ឬកើតមានអាការតប់ប្រមល់ខាងសរសៃប្រសាទក៏ព្រោះរាងកាយឈប់សំរាកមិនបានគ្រប់គ្រាន់នោះឯង ។ បញ្ហាបែបនេះអាហារពេលព្រឹកប្រភេទម្សៅ និងប្រភេទ ផ្អែមអាចជួយលោកអ្នកបាន ជាពិសេសអាហារប្រភេទស្ករ វាជួយបឺតស្រូបចូលរាងកាយបានល្អជាងគេ និងងាយស្រួលជាង ។

ដូច្នេះទឹកសៅ៊ផ្អែមៗ នៅពេលព្រឹកមួយកែវ អាចធ្វើឱ្យចិត្តគំនិតស្ងៀមស្ងប់បាន ព្រមទាំងជួយរំលាយភាពតប់ប្រមល់ធុញថប់បានយ៉ាងប្រសើរ បំផុតទៀតផង ។



**ទឹកបន្លែ និងផ្លែឈើ :** ជាប្រភេទទឹកដែលមានរសជាតិឆ្ងាញ់ ហើយងាយទទួលទាន ព្រមទាំងសំបូរទៅដោយ វីតាមីនជាច្រើនប្រភេទ ជាពិសេសវីតាមីន C វីតាមីន A ហ្វូលិក អាស៊ីដ និងរ៉ែធាតុដទៃទៀត ដូចជា សូដ្យូម ប៉ូតាស្យូម ស័ង្កសី ជាដើម ។ ក្រៅពីនោះនៅក្នុងទឹកបន្លែ ទឹកផ្លែឈើក៏នៅមានចំណែកផ្សំជាតិស្ករពីធម្មជាតិ រហូតដល់រសជាតិស្ករដែលបន្ថែមពីក្រៅទៀតផង ។

រសជាតិទាំងអស់នេះវាជួយផ្តល់នូវថាមពលដល់រាងកាយ ជួយបំបាត់ភាពហត់នឿយខ្សោះអស់កម្លាំង ធ្វើឱ្យរាងកាយបានស្រស់បស់ឡើងដូចដើមវិញ ។

**ទឹកក្រូចឆ្មារ :** ប្រសិនបើថ្ងៃណាមួយលោកអ្នកជួបនឹងអាការស្អក.កនិយាយចេញសំឡេងខ្សាវៗនោះ សញ្ញានេះប្រាប់អ្នកឱ្យដឹងទុកជាមុនថា អាការឈឺ.ក កំពុងតែឈានមករកយាយីហើយ ។ មធ្យោបាយដែលល្អ យើងសូមណែនាំឱ្យអ្នកស្វែងរកទឹកក្រូចឆ្មារមកទទួលទានជាភេសជ្ជៈសំរាប់ពេលព្រឹក ព្រោះនៅក្នុងទឹកក្រូចឆ្មារ មានអាស៊ីដស៊ីទ្រិត និងវីតាមីន C ។

សារជាតិនេះក្រៅពីជួយបំបាត់អាការឈឺ.កហើយនោះ វាថែមទាំងជួយឱ្យរាងកាយបានស្រស់បស់ ព្រមទាំងជួយបន្ថែមនូវក្លិនក្រអូបប្រហើរពីសំបកដែលបានច្របាច់ចេញធ្វើឱ្យអ្នកមានអារម្មណ៍កាន់តែធូរស្រាលឡើង ៕

(Continue From Page 02)

# Bridging the...

Being raised in a culture totally different from your culture of origin might force you to question your cultural identity creating conflicts not only within yourself but with your own family who does not accept or understand that culture. For example, a teenage girl raised in the United States does not want to attend school and her parents are upset (rightfully so) but assume that she does not want to attend school because she is lazy. Without understanding the many pressures of a teenage girl in the United States or her mental/emotional state of mind, they make their own assumptions based on their own experiences and knowledge. This teenage girl might assume that her parents will not understand that she does not want to attend school because of peer conflict and does not express her feelings to her parents; thus allowing them to assume that she is lazy.

Many children become frustrated that their parents do not understand them but if communication does not exist, it is unfair to make any assumptions. Our parents are not mind readers so we can not expect them to make any changes without first communicating to them what needs to be changed. The generational gap that contributes to the disconnectedness will continue to exist if no one takes a chance in communicating about the problems that exist.

How can we begin communicating with each other to build healthier relationships to 'bridge the gap' within our own ethnic group and culture?

Approximately one year ago, a newspaper published its first edition for Cambodian residents of Philadelphia to focus on Cambodian people and culture; to provide a voice to the voiceless, and to encourage the Cambodian people to become more informed (about each other) and to develop healthier relationships (with each other). Many people might not be aware that the two owners of this newspaper are from two different generations yet they were able to communicate with each other the purpose of this newspaper and provide a resource that is vital to this community. Let's use them as an example. They were able to use print media to communicate about problems, share success stories and inform the younger generation about the history of Cambodia while also teaching the older generation about the younger generation.

Yes, Cambodian people might share the same ethnic background; however, may not share the same culture, traditions, and values or even speak the same language. When this happens, people misunderstand each other; make assumptions, which then creates unhealthy relationships. If people do not address their differences, the cycle of unhealthy relationships will continue and unfortunately, passed on to future generations.

តមកពីទំព័រទី ០៣

## សកម្មជនសេតវិមាន...

ធ្វើឱ្យគេមិនអាចបំភ្លេចពីលោក Reagan បានធ្វើនយោបាយជាអ្នកដឹកនាំដ៏ត្រជាក់ក្នុងផ្នែកការទូតឱ្យប្លុកកុម្មុយនិស្ត សហភាពសូវៀត ដួលរំលំតាមយុទ្ធសាស្ត្រចរចារ និងការផ្សះផ្សាទំនាស់នយោបាយដោយសន្តិវិធី និងសន្តិភាពមិនគួរឱ្យជឿជាមួយអតីតប្រធានាធិបតីសហភាពសូវៀត Mikhail Gorbachev បច្ចុប្បន្នកំពុងស្នាក់នៅសហរដ្ឋអាមេរិក ។ អតីតប្រធានាធិបតី George H.W Bush វិញក៏ប្រើកណ្ដាប់ដៃយោធាក្នុងការឈឺឆ្អាលផ្នែករំលោភ



ស៊ីវ ស៊ីចាន់ ប្រគល់សៀវភៅឆ្នីមាសរបស់លោកឱ្យទៅឱ្យបណ្ណារដ្ឋនៅទីក្រុងឡុងបិច

សិទ្ធិមនុស្ស និងអធិបតេយ្យភាពបូរណភាពដែនដី ក្នុងការប្រយុទ្ធប្រឆាំងរារាំងមិនឱ្យប្រទេសអ៊ីរ៉ាក់វាយប្រហារទៅលើប្រទេស គុយវេត បានជោគជ័យ ក្នុងឆ្នាំ 1991 ដែលឱកាសជាគំរូទាំង2ខាងលើនេះហើយបានធ្វើឱ្យអតីតប្រធានាធិបតី George H.W Bush ត្រូវការមនុស្សសកម្មម្នាក់ជាជនជាតិអាស៊ីធ្វើជាជំនួយការផ្ទាល់ដើម្បីសម្លឹងមើលនិងរិះរកវិធានការណ៍ក្នុងការចូលខ្លួនដោះស្រាយបញ្ហាជម្លោះសង្គ្រាមដ៏រ៉ាំរ៉ៃនៅកម្ពុជា តាមបន្ទូលអតីតប្រធានាធិបតី Reagan ពីការស្នើសុំឱ្យសហរដ្ឋអាមេរិកជួយស្វែងរកសន្តិភាពឱ្យកម្ពុជាផង ។ ដែលការស្នើសុំកើតចេញពីការចរចារក្នុងជំនួបរវាងសម្ដេចនរោត្តម សីហនុ និង Ronald Reagan នាឆ្នាំ 1982 ។ ដែលពេលនោះលោកស៊ីវ ស៊ីច័ន្ទ បានក្លាយជាមនុស្ស សកម្មក្នុងសេតវិមានធ្វើការងារមនុស្សធម៌ និងជាអ្នកការទូតតំណាងឱ្យរដ្ឋាភិបាលអាមេរិក ចូលខ្លួនដើម្បីស្វែងរកដំណោះស្រាយសន្តិភាពឱ្យកម្ពុជាពីដើម រហូតដល់ចប់កើតមាននូវកិច្ចព្រមព្រៀងសន្តិភាពនាទីក្រុងប៉ារីស ថ្ងៃទី 23 តុលា ឆ្នាំ 1991 ដែលបានទាញគូប្រឆាំងគ្នាក្នុងភ្នក់ភ្លើងសង្គ្រាម ជាង 10ឆ្នាំ ដោយគិតពីថ្ងៃគេចោទថា យួនរំលោភបំពានប្រទេសកម្ពុជាក្នុងអំឡុងឆ្នាំ 1979 មានភាគី ហ៊ុន សែន ត្រូវបានយួនលើកបន្ទុបជាមួយរដ្ឋាភិបាលចម្រុះ ត្រីភាគីនៅព្រំដែន សៀម មាន សីហនុ, សឺន សាន, ខៀវ សំផន ឱ្យត្រូវរ៉ូវគ្នាក្នុងផ្លូវទៅរកសន្តិភាពមួយ ៕

**នៅមានត**

# សូមស្វាគមន៍ដំណើរមកដល់នៃនិស្សិតខ្មែរកម្ពុជាក្រោមពិភពលោក

ដោយ : តឹមភៀន

●●●និស្សិតខ្មែរកម្ពុជាក្រោមនៅជុំវិញពិភពលោក នឹងមកជួបជុំគ្នានៅមជ្ឈមណ្ឌលធម្មនុញ្ញនៃសហរដ្ឋអាមេរិក (National Constitution Center) នៅទីក្រុងហ្វីឡាដែលហ្វៀ យើងនៅថ្ងៃសៅរ៍ ទី ២៣ឧសភា ឆ្នាំ២០០៩នេះ ចាប់ពីម៉ោង៩:០០ ព្រឹក រហូតដល់ម៉ោង ៥:០០ល្ងាច ។ និស្សិតទាំងនេះ នឹងអញ្ជើញមកពីប្រទេសនានាលើពិភពលោកសេរី ដូចប្រទេសបារាំង, អ៊ីតាលី, អូស្ត្រាលី, នូវែលសេឡង់, កាណាដា, នឹងមកពីរដ្ឋនានានៃ សហរដ្ឋអាមេរិក ។ ការជួបជុំគ្នានេះមានបំណងបង្ហាញឱ្យឃើញពីពាក្យថា " ទំពាំងស្នងឫស្សី" របស់សហព័ន្ធខ្មែរកម្ពុជាក្រោមក្នុងរឿងប្រគល់ឱ្យយុវជនបន្តវេនទាមទារសិទ្ធិសេរីភាពជាជនម្ចាស់ស្រុកពីចក្រពត្តិអាណានិគមយួន, ការពារ និង កសាងប្រទេសជាតិខ្លួនពេលដណ្ដើមបានមកក្នុងដៃរបស់ខ្លួនរួចហើយ ។ ការពិសោធន៍បានបង្ហាញឱ្យឃើញថា ការដែលមនុស្សចាស់កាន់ក្ដាប់នូវអំណាចឬផលប្រយោជន៍អ្វីម្យ៉ាងតែគ្នាឯងមួយក្រុមដល់ពេលពួកគាត់ស្លាប់ទៅក្មេងជំនាន់ក្រោយង៉េមង៉ាមហេងហាងមិនដឹងថា ត្រូវចាប់អីកាន់អីដើរទៅទិសខាងណា. . . ។ល។ គឺគ្មាននិរន្តរភាពពីជំនាន់មួយទៅជំនាន់មួយទៀត ។ នេះជាចំណុចខ្សោយមួយដែលប្រវត្តិសាស្ត្រខ្មែរបានបង្ហាយឱ្យយើងឃើញថា ជំនាន់រុងរឿងមួយបានធ្លាក់ចុះទៅក្នុងភាពទន់ខ្សោយយ៉ាប់យ៉ឺននៃមហានគរខ្មែរ ។ កំហុសប្រវត្តិសាស្ត្រនេះជាមេរៀនដ៏មានតម្លៃដែលសហព័ន្ធខ្មែរកម្ពុជាក្រោមបានរៀនហើយបានចងចាំក្នុងការចាប់ផ្ដើមតភ្ជាញចងក្រងប្រវត្តិសាស្ត្រឡើងវិញសារជាថ្មីក្នុងការតភ្ជាប់ជំនាន់របស់ខ្លួន នឹងយុវជនជាស្រកបន្តបន្ទាប់កុំឱ្យបែកឃ្លាតពីគ្នា ។ ម្យ៉ាងទៀតមនុស្សចាស់ ត្រូវចេះអប់រំឱ្យតម្លៃ និងតម្រង់ទិសដៅឱ្យយុវជនរបស់ខ្លួនបានដូច្នេះអ្នកជំនាន់ក្រោយច្បាស់ជាបន្តដំណើរតាមមាគ៌ាដែលអ្នកជំនាន់មុនបានគូសវាសទុកមកឱ្យ ។ យើងក៏ត្រូវចងចាំជានិច្ចដែរថា យើងជាមនុស្សចាស់ត្រូវតែជាគំរូដ៏ល្អរបស់កូនចៅយើង ។ " បើអ្នកផឹក, អ្នកល្បែង,អ្នកស្អប់ការសិក្សា" ពិតជាពិបាកក្នុងការណែនាំឱ្យកូន " កុំផឹក, កុំល្បែង, កុំបោះបង់ការសិក្សា" នោះបានណាស់ ។

យើងជាខ្មែរនិយាយរួមមិនមែនតែខ្មែរកម្ពុជាក្រោមទេ) ឱ្យតែអ្នកដែលមានឈាមជាខ្មែរកំពុងរត់នៅក្នុងសរសៃ, បេះដូង, ថ្លើម, ប្រមាត់, ឆ្អឹង, ស្បែក...ហើយដែលកំពុងរស់នៅលើភពផែនដីនេះត្រូវនាំគ្នាកសាងខ្លួនជាថ្មីសារឡើងវិញ ហើយខំរួមដៃគ្នាដូចជនជាតិស៊ីហ្វ (Juif =Juw) បានរឹង ជំហរកសាងបានប្រទេសអ៊ីស្រាអែលឡើងវិញ ដូច្នោះដែរ ។ ផ្លូវវែងឆ្ងាយក៏ពិតមែនហើយ តែបើយើងនាំគ្នាបោះជំហានតាមផ្លូវត្រូវ : មួយជំហានបោះទៅមុខ គឺផ្លូវវែងនោះ បានខ្លីមកមួយជំហានដែរ ។ យើងនាំគ្នាបោះជំហានកុំឈប់គោលដៅរបស់យើងនឹងនៅខ្លីទៅៗមិនខាន ។ យើងខំប្រឹងដោយនិរន្តរភាពយើងប្រាកដជាទៅដល់គោលដៅ ដែលឆ្ងាយដាច់ស្រយ៉ាលនោះមិនខានឡើយ ។

តើយុទ្ធជននិស្សិតខ្មែរកម្ពុជាក្រោមទាំងនោះ កាត់មកពីគ្រប់ច្រកល្ហកនៃពិភពលោកមកកាន់មជ្ឈមណ្ឌលធម្មនុញ្ញជាតិនៃសហអាមេរិកនៅហ្វីឡាដែលហ្វៀនេះ ក្នុងគោលបំណងអ្វីខ្លះ? ។ បើតាមសំដីអ្នកនាំពាក្យសហព័ន្ធខ្មែរកម្ពុជាក្រោមបានឱ្យដឹងថា " បានជាជ្រើសរើសយកមជ្ឈមណ្ឌលនេះ ដើម្បីជាកន្លែងជួបជុំគ្នាព្រោះកន្លែងនេះធ្លាប់ជាកន្លែងប្រវត្តិសាស្ត្រនៃសហអាមេរិកក្នុងរឿងប្រកាសឯករាជ្យរបស់ខ្លួន, បង្កើតនឹងប្រកាសរដ្ឋធម្មនុញ្ញដ៏

តទៅទំព័រទី១៧

តមកពីទំព័រទី ១២

# បទសម្ភាសន៍ក្នុងសន្និសីទ...

ប្រឹក្សាអន្តរសាសនា " ដែលមានទីស្នាក់ការនៅទីក្រុងបាងកក ឱ្យចូលរួមប្រារព្ធបុណ្យវិសាខបូជា ជាមួយអង្គការអន្តរសាសនា ៩៦អង្គទៀត ដើម្បីប្រជុំពីកិច្ចការអន្តរសាសនាផង និងធ្វើបុណ្យវិសាខបូជាផង កាលពីថ្ងៃទី ៦ រហូតដល់ថ្ងៃទី ៨ ឧសភា មុននេះ នាទីក្រុងបាងកក ។

**សុបិន ថាច់** : ក្នុងតួនាទីជាព្រះសង្ឃ តើព្រះអង្គជួយសហព័ន្ធខ្មែរកម្ពុជាក្រោមរបៀបណា ?

**ព្រះអង្គថាច់ប៊ឺរ៉ុង** : តួនាទីខ្ញុំព្រះករុណាអាត្មាភាពជាព្រះសង្ឃនេះ ក៏ដូចជាពលរដ្ឋឯទៀត ជាខ្មែរក្រោមនេះ បានចារជាប់ក្នុងបេះដូងថា ព្រះពុទ្ធសាសនា គឺជាអត្តសញ្ញាណរបស់ខ្មែរ កម្ពុជាក្រោម បានន័យថា វប្បធម៌ ប្រពៃណី សិល្បៈ អក្សរសាស្ត្រទាំងអស់ ដែលលើទឹកដីកម្ពុជាក្រោម ដែលមានព្រះសង្ឃ២៥.០០០អង្គ វត្ត៥៦០ បានបង្កប់ជាឃឿនវប្បធម៌នៅទីនោះឯង ដូច្នេះតួនាទីខ្ញុំព្រះករុណាអាត្មាភាពពេលនេះ មានកាតព្វកិច្ចទី១- ចងក្រងចលនាព្រះពុទ្ធសាសនាថេរវាទ ក្នុងពិភពលោកឱ្យបានជាប្រព័ន្ធទី១ ក្នុងនាមថាជា " ប្រព័ន្ធព្រះពុទ្ធសាសនាគណៈថេរវាទខ្មែរកម្ពុជាក្រោម នៅក្រៅប្រទេស " ទី២- ធ្វើសហប្រតិបត្តិការជាមួយចលនា "សហព័ន្ធខ្មែរកម្ពុជាក្រោម " ដែលមានទាក់ទងទៅនឹងកិច្ចការអន្តរសាសនា ដូចជានៅថ្មីៗចូលរួមជាមួយអង្គការអន្តរសាសនា ដែលគេនិយាយពីព្រះពុទ្ធសាសនាទាក់តងទៅនឹង វិបត្តិពិភពលោក ដូចជាសេដ្ឋកិច្ច បរិដ្ឋាន នយោបាយ វប្បធម៌... ។ល។ នៅក្នុងនោះក៏មានព្រះសង្ឃយួន ប្រមាណ ២០០អង្គ ដែលនិមន្តមកពីទីក្រុង ហៃ និងទីផ្សេងៗទៀត ហើយក៏មាននិមន្តព្រះសង្ឃមេគន្ធខ្មែរចំនួនបួនខេត្ត មានទី១ ព្រះតេជគុណ យៃម លន់ តំណាងឱ្យទីក្រុងព្រៃនគរ ដែលជាទីក្រុងរបស់ខ្មែរយើង, ព្រះតេជគុណ ថាច់ សុខសាន្ត តំណាងឱ្យខេត្ត ព្រះត្រពាំង, ព្រះតេជគុណ តោ យឹន តំណាងឱ្យព្រៃកប្បស្សី និងព្រះតេជគុណ យៃម ធីម តំណាងឱ្យខេត្តឃ្លាំង និងមាត់ជ្រូក ដែលព្រះសង្ឃទាំងនោះ ត្រូវគេហាមឃាត់មិនឱ្យនិយាយថា ជាព្រះសង្ឃខ្មែរទៀតផង ។ ខ្ញុំព្រះតេជគុណអាត្មាភាពបានធ្វើ អនុសាសន៍សំដែងការរំលោភសិទ្ធិនេះដាក់ជូនអង្គប្រជុំ ដែលករណីនេះបានទទួលការគាំទ្រពីមហាប្រទេស ហើយថ្ងៃទី ២៦ខាងមុខនេះ អាត្មាភាពនឹងនិមន្តទៅក្រសួងការបរទេសអាមេរិកាំង ដើម្បីលើកយកការរំលោភសិទ្ធិច្រើនប្រការរបស់ព្រះសង្ឃខ្មែរនៅកម្ពុជាក្រោម ដើម្បីឱ្យគេជួយការពារ ។

**សុបិន ថាច់** : ព្រះអង្គមានពុទ្ធដីការថា មានការគាបសង្កត់ព្រះសង្ឃមានរាប់ម៉ឺនអង្គ រីឯវត្តមានច្រើនរយវត្ត ខ្ញុំព្រះករុណា និងពលរដ្ឋឯទៀត មើលករណីនេះមិនឃើញទេ តើព្រះអង្គអាចពន្យល់ពីការគាបសង្កត់នេះ បានដែរឬទេ ?

**ព្រះអង្គថាច់ប៊ឺរ៉ុង** : គេតែផ្សព្វផ្សាយថា ព្រះពុទ្ធសាសនា ជាថ្នាំពិសពុលសម្រាប់មនុស្សលោក រដ្ឋអំណាចបានខិតខំធ្វើបាបនោះ គេព្យាយាមបិទ បាំងពីភ្នែកពិភពលោក, យួនតែភូតភរមតិសាធារណថា គ្មានអំពើរបៀបនេះទេ តែកាលពី ខែមករា ២០០៩ ក្រសួងឃ្លាំមើលការគោរពសិទ្ធិមនុស្សនៃ អ.ស.ប បានចេញសៀវភៅមួយ រាយការណ៍ពីការរំលោភសិទ្ធិមនុស្សរបស់រដ្ឋាភិបាលវៀតណាម មកលើព្រះសង្ឃ ព្រះពុទ្ធសាសនាខ្មែរកម្ពុជាក្រោម ដែលមាន ១២៦ទំព័រ ហើយថ្មីៗនេះ វៀតណាម បានចាប់ព្រះអង្គ ទឹម សាខន ទាំងរំលោភពីទឹកដីកម្ពុជា ហើយចាប់ព្រះសង្ឃខេត្តឃ្លាំង ៥ព្រះអង្គទៀត យកទៅផ្សឹក ដើម្បីដាក់ទោស, ឥឡូវនេះ ព្រះសង្ឃនៅក្រមួនស នៅខេត្តឃ្លាំង មាត់ជ្រូក កំពុងតែបន្តបាតុកម្ម ដោយសារតែរដ្ឋាភិបាលយួន នៅតែឈ្លានពានយកទឹកដី ស្រែចំការពីពលរដ្ឋខ្មែរកម្ពុជាក្រោម ករណីនេះត្រូវបានផ្សព្វផ្សាយដោយបណ្ដាញព័ត៌មាន ដូចជាខ្មែរប៉ុស្តិ៍ដែលកំពុងតែមានប្រជាប្រិយភាព ដូចជា អាស៊ីសេរី ឬវិទ្យុសម្លេងសហរដ្ឋអាមេរិក ដូច្នេះជាមួយនឹងបណ្ដាញផ្សព្វផ្សាយអន្តរជាតិ គឺខ្មែរទាំងក្នុង និងក្រៅស្រុក និងខិតខំឱ្យរឿងពិតទាំងឡាយបានត្រូវខ្ចខ្ចាយមិនឱ្យលាក់បាំងបានឡើយ ។

**សុបិន ថាច់** : បើតាមខ្ញុំព្រះករុណាអានអត្ថបទ Asian Wach ទៅឃើញថា គេនិយាយពីការរំលោភលើព្រះសង្ឃ និងពុទ្ធសាសនាយួនច្រើនជាងការនិយាយខាងខ្មែរ តើព្រះអង្គមានបានធ្វើសហការណ៍ជាមួយលោកសង្ឃយួន តាមរូបភាពណាមួយទេ ដើម្បីការពារបុព្វហេតុសាសនាជាក្រុម ?

**ព្រះអង្គថាច់ប៊ឺរ៉ុង** : រដ្ឋាភិបាលវៀតណាម បានបង្កើនចលនាវៀតណាម សម្រាប់បំបែក ឬបង្ក្រាបខ្មែរនៅកម្ពុជាក្រោម ខ្មែរកម្ពុជាក្រោមរក្សាព្រះពុទ្ធសាសនាគណៈថេរវាទអស់រយៈជាង ២០០០ឆ្នាំ ចាប់ពីឆ្នាំ ១៩៧៥ មកយួនបាន បង្កើត " គណៈថេរវាទឯកភាពជាតិមួយ " នេះគឺសម្រាប់មកបង្ក្រាបគណៈថេរវាទខ្មែរតែប៉ុណ្ណោះ អំពើប្រជាភិថុតរបស់រដ្ឋបាលយួន ដែលលើកព្រះសង្ឃគណៈមហាយានឱ្យមកគ្រប់គ្រង់ប្រាសចាកវិន័យថេរវាទឆ្ងាយមេឃនិងដី គឺធ្វើយ៉ាងណាឱ្យបានកំចាត់ចលនាព្រះពុទ្ធសាសនាថេរវាទ ខ្មែរក្រោមឱ្យបានឆាប់រហ័សតែប៉ុណ្ណោះ ។

**សុបិន ថាច់** : អរព្រះគុណ ថ្វាយបង្គំ ព្រះអង្គថាច់ ប៊ឺរ៉ុង ។

សន្និសិទយុវជនខ្មែរក្រោម ដែលផ្ដើមនា ម៉ោង ៩:៣០នាទីព្រឹក បានចប់ទៅវិញនៅម៉ោង ៤ រសៀល ដោយមានសមាជិក និងភ្ញៀវកិត្តិយសប្រមាណជិត ១០០នាក់ ចូលរួមមានទាំងតំណាងសមាជិកអ៊ីតាលី ផងដែរ ៕

**ចម្លងពីខ្សែអាត់ជាភាសាខ្មែរ ដោយ : ពិន សំខុន**

# ហោរាសាស្ត្រប្រចាំ ថ្ងៃទី ០១_១៥ មិថុនា

### ឆ្នាំជូត : (ពពួកទេព្តាប្រុស ធាតុទឹក)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អតលាស់ទៅមុខដោយសន្សឹម១ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏មិនត្រូវធ្វើទាំងចិត្តតក់ក្រហល់ដោយខ្វះការពិចារណានោះឡើយ ព្រោះបើមានការភ្លាំងភ្លាត់តែបន្តិចអាចបង់ខាតផលប្រយោជន៍ច្រើន ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះ ចូរប្រយ័ត្នប្រយែងក្រែងមានអ្នកក្រៅមកញុះញង់ ៕

### ឆ្នាំឆ្លូវ : ( ពពួកមនុស្សប្រុស ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អតលាស់ទៅមុខដោយសន្សឹម១ ។ ក្នុងរយៈពេលនេះ ថ្វីត្បិតតែទើបឈានចូលឆ្នាំថ្មី ហើយរាល់កិច្ចការងាររកស៊ីនៅជួបនឹងឧបសគ្គខ្លះ១ក្តី តែកុំភ័យព្រួយអ្វីឡើយ ព្រោះលោកអ្នកអាចរកដំណោះស្រាយបានជ្រះស្រឡះទាំងអស់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះប្រយ័ត្នមានអ្នកទីពាចូលមកជ្រៀតជ្រែក ៕

### ឆ្នាំខាល : ( ពពួកយក្សស្រី ធាតុឈើ )

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាលំបាក១ច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរកុំមានការធ្វេសប្រហែសឱ្យសោះ ជាពិសេសចំពោះអាជីវករអ្នករកស៊ីជួញដូរមុននឹងទទួល ឬប្រគល់ទំនិញសព្វសារពើ ចូរចេះពិនិត្យគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍មានរឿងរកាំរកូសច្រើន ៕

### ឆ្នាំថោះ : ( ពពួកមនុស្សស្រី ធាតុឈើ )

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ គឺតែងទទួលបាននូវផលសម្រេចជាប់ជានិច្ច ។ លោកអ្នកអាចបណ្តាក់ទុនរកស៊ី ឬក៏ចេញទៅជួញដូរផ្លូវឆ្ងាយមិន ថាផ្លូវគោក ឬផ្លូវទឹកឡើយ គឺប្រកបតែសេចក្តីសុខ ព្រមទាំងអាចរកចំណូលចូលផ្ទះយ៉ាងគាប់ចិត្តទៀតផង ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានការយល់ចិត្តគ្នាល្អណាស់ ៕

### ឆ្នាំរោង : (ពពួកទេព្តាប្រុស ធាតុមាស)

រាសីរបស់លោកអ្នកស្រុតចុះយ៉ាងខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបនឹងបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះអ្វីដែលលោកអ្នកត្រូវយកចិត្តទុកដាក់នោះ ចូរប្រយ័ត្នប្រយែងចំពោះជនខិលខូចដែលនៅក្បែរ១លោកអ្នក ព្រោះពួកគេមានគំនិតប៉ុនប៉ងធ្វើអំពើអាក្រក់ដោយមិនចេញមុខ ដូច្នេះត្រូវមានស្មារតីប្រុងប្រយ័ត្នជាប់ជានិច្ច ។ ចំពោះគូស្វាមីភរិយាក្នុងរយៈពេលនេះមានរឿងរកាំរកូសច្រើន ៕

### ឆ្នាំម្សាញ់ : (ពពួកមនុស្សប្រុស ធាតុភ្លើង)

រាសីលោកអ្នកល្អជាធម្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះអ្វី១ច្រើនមានការប្រែប្រួលពុំទៀងទាត់ឡើយ ដូច្នេះបើលោកអ្នកមានលក់ដី ធ្លី ផ្ទះសម្បែង ឬវត្ថុមានតម្លៃផ្សេង១ ចូរធ្វើលិខិតស្នាមជាលាយល័ក្ខអក្សរដោយមានចុះហត្ថលេខា ឬផ្តិតស្នាមមេដៃឱ្យបានត្រឹមត្រូវទើបទៅថ្ងៃមុខ ពុំមានបញ្ហាចោទឡើង។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមានភាពស្និទ្ធស្នាលដូចប្រក្រតី ៕

### ឆ្នាំមមី : (ពពួកទេព្តាស្រី ធាតុភ្លើង)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាលំបាក១ច្រើន ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបកិច្ចការងារអ្វីក៏ដោយ ចូរមានការប្រុងប្រយ័ត្នជាប់ជានិច្ច ជាពិសេសចំពោះអ្នកជំនួញជួញដូរមុននឹងប្រគល់ ឬទទួលនូវមុខទំនិញសព្វសារពើ ត្រូវចេះពិនិត្យមើលគុណភាព និងរាប់ចំនួនឱ្យបានត្រឹមត្រូវទើបមិនចាញ់បោកគេ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះច្រើនពាក់មុខយក្សដាក់គ្នា ៕

### ឆ្នាំមមែ : (ពពួកទេព្តាស្រី ធាតុមាស)

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អគ្រាន់បើ ។ ក្នុងរយៈពេលនេះលោកអ្នកនឹងបានជួបនូវគូប្រជែងជើងខ្លាំងចេញមុខមកតតាំង ដូច្នេះចូរចេះរៀបចំជើងព្រួលទុកសម្រាប់ទប់ទល់ជាមុន ទើបមិនលិចលង់ទាន់តែហាមដាច់ខាតការប្រើកម្លាំងបាយដោះស្រាយបញ្ហា ព្រោះវាបានត្រឹមតែខាតបង់ទាំងសងខាងតែប៉ុណ្ណោះ ។ ចំពោះគូស្នេហ៍មានការយល់ចិត្តគ្នាល្អណាស់ ៕

### ឆ្នាំវក : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកឡើងខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អតលាស់ទៅមុខជាលំដាប់ ។ ក្នុងរយៈពេលនេះ ទោះជាលោកអ្នកបានប្រកបការងារអ្វីក៏ដោយ ក៏អាចដំណើរការបានស្រួលដែរ ។ ចំពោះអ្នករកស៊ីជួញដូរក្នុងរយៈពេលនេះនឹងមានទ្រព្យហូរចូលប្រៀបដូចត្រូវឆ្នោត ព្រោះមានទំនិញលក់ចេញទិញចូលឥតទំនេរដៃ ។ ចំពោះគូស្នេហ៍ក្នុងពេលនេះកាន់តែប្រកបដោយភាពផ្អែមល្ហែម ៕

### ឆ្នាំរកា : (ពពួកយក្សប្រុស ធាតុដែក)

រាសីលោកអ្នកស្រុតចុះខ្លាំង ។ រាល់កិច្ចការងាររកស៊ីជួញដូរជួបបញ្ហាស្មុគស្មាញច្រើន ។ ក្នុងរយៈពេលនេះ លោកអ្នកត្រូវចេះគ្រប់គ្រងទ្រព្យឱ្យបានគង់វង្ស ជាពិសេសអ្នករកស៊ីជួញដូរហាមបណ្តាក់ទុនរកស៊ីដោយទ្រង់ទ្រាយធំ ឬក៏ឱ្យអតិថិជនជំពាក់បំណុលច្រើន ព្រោះអាចនឹងខាតបង់ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះមិន សូវបានសុខកាយសប្បាយចិត្តទេ ព្រោះមានរឿងរកាំរកូសច្រើន ៕

### ឆ្នាំច : ( ពពួកយក្សស្រី ធាតុដី )

រាសីលោកអ្នកល្អជាមធ្យម ។ រាល់កិច្ចការងាររកស៊ីជួញដូរមានការរីកចម្រើនល្អតលាស់ទៅមុខដោយសន្សឹម១ ។ ក្នុងរយៈពេលនេះទោះជាលោកអ្នកអាចរកផលចំណូលបានច្រើនគួរសមក្តី តែពុំមានសល់អ្វីជាដុំកំភួនឡើយ ព្រោះការចាយវាយខ្វះខ្នាយខ្លាំងពេក ហើយក៏មិនខុសពីទូកចំក្តោងធំដែរ គឺបានត្រឹមតែចំណាយពេលវេលា និងកម្លាំងឥតអំពើ ។ ចំពោះគូស្នេហ៍ក្នុងរយៈពេលនេះទាល់តែចេះអត់ធ្មត់ទើបទទួលបានសេចក្តីសុខ ៕



### ឆ្នាំកុរ : (ពពួកមនុស្សស្រី ធាតុទឹក)

រាសីលោកអ្នកខ្ពស់ត្រដែត ។ រាល់កិច្ចការងាររកស៊ីជួញដូរបានកាក់កបល្អណាស់ ។ ក្នុងរយៈពេលនេះរាល់ឧបទ្រពចង្រៃ និងរាល់ឧបសគ្គត្រូវបានសាបរលាបបាត់ស្រមោលអស់រលីង ដូច្នេះលោកអ្នកអាចរកស៊ីជួញដូរបានពេញដៃពេញ ជើង ហើយទោះជាបានជួបនឹងគូប្រជែងជើងខ្លាំងចេញមកតតាំងក៏មិនភ័យព្រួយដែរ ព្រោះលោកអ្នកអាចយកប្រៀបឈ្នះជានិច្ច ។ រយៈពេលនេះចំពោះគូស្នេហ៍ប្រកបតែសេចក្តីសុខសាន្តក្សេមក្សាន្ត ៕

(តមកពីទំព័រទី ១៥)

## សូមស្វាគមន៍ដំណើរ...

ល្បីល្បាញរបស់ខ្លួនផង និងជាគំរូដ៏ល្អសំរាប់ប្រទេសផ្សេង១យកទៅពិចារណា និងពង្រឹងឱ្យរដ្ឋធម្មនុញ្ញរបស់ប្រទេសខ្លួន បានល្អឥតខ្ចោះផង ។ ម្យ៉ាងវិញទៀតនេះជាលើកទីបីហើយដែលនិស្សិតខ្មែរកម្ពុជាក្រោមបានជួបជុំគ្នាក្រោយពេលបញ្ចប់សន្និសីទអន្តរជាតិនា១លើពិភពលោកស្តីពីបញ្ហាទឹកដីកម្ពុជាក្រោមរបស់ខ្លួន ដើម្បីរាយការណ៍នូវកិច្ចការដែលគេបានបំពេញ និងពិគ្រោះយោបល់ជាមួយរៀមច្បងនូវផែនការណ៍ ដែលគេត្រូវធ្វើបន្តទៅទៀត។ នេះក៏ជាឱកាសឱ្យយុវជនផ្សេង១ដែលមិនបានទៅចូលប្រជុំសន្និសិទអន្តរជាតិមានឱកាសបានស្តាប់, បានរៀនសូត្រជាមួយគ្នាផងដែរ ។ ការជួបជុំគ្នាលើកនេះត្រូវបានធ្វើឡើងក្រោយពីសន្និសីទអន្តរជាតិដែលអង្គការសហប្រជាជាតិបានប្រារព្ធធ្វើឡើង នៅទីក្រុងស៊្សីណែវ ដើម្បីកោះហៅរដ្ឋាភិបាលយួន កុម្មុយនីស្តឱ្យទៅឆ្លើយពីបញ្ហាសិទ្ធិមនុស្ស, ការសង្កត់សង្កិនជនជាតិដើមម្ចាស់ស្រុក, សិទ្ធិគោរពជំនឿសាសនា, ការអប់រំរៀនសូត្ររបស់ជនជាតិដើម ។ល។ សហព័ន្ធខ្មែរកម្ពុជាក្រោម និងអង្គការអន្តរជាតិនានាជាដើមបណ្តឹង ។ សហព័ន្ធខ្មែរកម្ពុជាក្រោមបានបណ្តុះបណ្តាលឱ្យយុទ្ធជនដើរអមជាមួយខ្លួនទីមួយ ដើម្បីឱ្យមាននិរន្តរភាពទីពីរមានតែយុវជនទេដែលក្តាប់បានយ៉ាងម៉ាំនូវភាសា,ព័ត៌មានវិជ្ជា (Computer) ដែលចាស់១ពុំអាចតាមទាន់ល្បឿនអភិវឌ្ឍន៍ដ៏អស្ចារ្យរបស់មុខវិជ្ជានេះបានឡើយ ។

ក្រៅពីការសន្ទនាពីការថ្លែងរាយការណ៍,ការយកចិត្តទុកដាក់ស្តាប់, នៅមានការរាំរែក, ច្រៀងសប្បាយរីករាយចាប់ពីម៉ោង៨:០០យប់ ទៅនាថ្ងៃដដែល នៅសាយហ្គនម៉ាក់ស៊ីមផង ៕





តមកពីទំព័រទី ០៦ **អតីតយុទ្ធជនស្ម័គ្រចិត្ត...**

fellow comrades to keep our patriotism and integrity alive".

Phouc Kim is one of the most dedicated servicemen of his generation. Phouc was born in Kleang (Khmer Krom), South Vietnam on April 6th, 1951. Driven by his endearing love for Cambodia, Phouc believed that Khmer Krom would once again be united with its mother country.

Phouc's parents were rural farmers who worked hard to instill education and values to their son. Like many young men who wanted to increase their religious and educational livelihood, Phouc became a Buddhist monk from 1965-1968. However, because both Cambodia and Vietnam were facing heightened political strives, Phouc joined the Liberation Front to serve his country.

In Cambodia, he fought under the American-supported Commander, Lon Nol. After the fall of South Vietnam, Phouc had the good fortune to revisit his family in Vietnam (or risk being ambushed by the Khmer Rouge). "The battle of Watt Vihear Sur in Prey Veng was the most bloodiest battle I have fought in. The communist North Vietnam wanted to attack to Phnom Penh, the capital of Cambodia. There was a great air battle as well as on grounds. There was help from Thailand, South Vietnam, and the United States.

I was in the 7th Brigade E (under Lon Nol). There were 50 brigades in all with 10 brigades at that battle. I saw Viet Congs being shackled down by their ankles, so as to stay put and fight in battle. There were bombs dropping, bullets flying, and dead bodies dropping like flies. In all, 450 people were severely wounded or have died. There were even women out there. These were the most courageous, fear- less women you'll ever see! I believe there were 300 women in our entire battalion who fought for Cambodia during these tumultuous times. This battle will always be encapsulated in my memory because I witness the terrifying, the treacherous, and the most fearsome acts of violence in my life."

"Everyone had a secret agenda and it was never for the people." In 1989, Phouc was sent to further his military training in Malaysia. At the end of that year, he immigrated to the United Sates. Since then, he has called Philadelphia his home. Phouc is proud to have served his country and hopes to be able to encourage the younger generations to talk and discuss about Cambodia's heritage, history, and culture.

Contributed Writer: **Bopea Chum.**

J. R. Lowell Elementary School Teacher.

Contact: bchum@philasd.org

# Randolph C. Smith




## Attorney at Law

## 267-324-6503

**Office # 1**
**1819 JFK Blvd.**
**Philadelphia, Pa 19103**

**Office # 2**
**1115 S. 11th St.**
**Philadelphia, Pa 19147**

ការិយាល័យច្បាប់យើងខ្ញុំ មានចំនាញខាងករណី គ្រោះថ្នាក់រថយន្ត
☞ ការរបួសនៅកន្លែងធ្វើការ ☞ បើកបរក្រោមឥទ្ធិពលស្រវឹង
☞ ករណីឧក្រិដ្ឋកម្ម និងអន្តោប្រវេសន៍ យើងនឹងយកចិត្តទុកដាក់
ពីរថយន្តពីអ្វីទាំងអស់ដោយមិនឱ្យលោកអ្នកចំណាយប្រាក់ខ្លួនឯងឡើយ ។
បើចង់ដឹងអ្វីបន្ថែមសូមហៅរក **សុធា : (267) 324-6503**

We are specialty in Car Accident, Work Injury, DUI, Criminal Matter, and Imminration.

We will take care of your car and everything else without your pochet expense.
Please contact Sothia at 267-324-6503 for more information.

---

# ហាងម្ចាស់ នួន វីដេអូ សូមស្វាគមន៍

## នាឱកាសចូលឆ្នាំថ្មី 2009

មានលក់ CD VCD & DVD

## MCHAS NOUN VIDEO

647 RITNER ST. PHILADELPHIA, PA 19148
Tel : (215) 465-0464

ម្ចាស់នួន វីដេអូ MACHAS NUON VIDEO
Clothes, Video Rental, Accessories
647 RITNER STREET TEL: 215-465-0464

យើងខ្ញុំមានលក់សំលៀកបំពាក់ប្រពៃណីខ្មែរ និងម៉ូដទាន់សម័យសំរាប់ចូលរួមពិធីផ្សេងៗមាន CD ,DVD និងមានរបស់របរច្រើនមុខទៀត ។

ប្រសិនបើសំលៀកបំពាក់ដែលបងប្អូនទិញ ហើយពាក់មិនត្រូវទេ យើងអាចកែរជូនដោយឥតយកកំរៃ យើងក៏មានទទួលកាត់ដេរ និងកែសម្រួលសំលៀកបំពាក់ដែលលោកអ្នកនាំមកពីក្រៅហាង យើងខ្ញុំដោយយកតម្លៃសមរម្យ ។

---

# ផ្កាយព្រឹក វីដេអូ

PKAY PREK VIDEO
(215) 455-2762
4935 OLD YORK RD. PHILADELPHIA, PA 19141

ជួលកុន_លក់ឌីវីឌី និង ស៊ីឌី
MOVIE RENTAL
DVD & CD SALES
លក់សំពត់អាវនៅបុណ្យការសំរាប់ស្ត្រី និងសំពត់អាវ ចូរខោអាវដើរលេងធម្មតា សំរាប់ស្ត្រី និងកុមារ ។
CAMBODIAN FORMAL DRESSES
WOMEN & BABY CASUAL WEARS

---

# ឱសថស្ថានខ្មែរ

Sav-Mor PHARMACY Tel: 215-467-1220

**Sav-Mor PHARMACY**
Sam EA R.Ph.
2232 S. 7th St. (7th & Wolf) Philadelphia, Pa 19148
Tel: 215.467.1220 Fax: 215.467.1447

## បំរើលោកអ្នកដោយមិត្តភាព និងទាន់ចិត្ត

- ▸▸Sav-Mor គឺជាឱសថស្ថានបំរើ ការចែកចាយថ្នាំ ហើយអាចពន្យល់ពីរបៀបប្រើប្រាស់ថ្នាំ តាមវេជ្ជបញ្ជាជាភាសាខ្មែរបាន
- ▸▸យើងទទួលយកនូវ MEDICARE MEDICAID និង INSURANCES ជាច្រើនទៀតផង យើងមានលក់កាត សំរាប់ទូរស័ព្ទទៅស្រុកខ្មែរ ឬទៅអន្តរជាតិ

*Accept most insurance plans including Medicare & Medicaid
*Easy Prescription transfer
*Inside. Prepaid phone card. Call Cambodia.

---

WEDGE MEDICAL CENTER

# ដំណឹងរកអ្នកធ្វើការ

"វេជ មេឌីខលសេនធ័រ" រកអ្នកធ្វើការច្រើននាក់ចេះនិយាយភាសាខ្មែរមានកំរិតសិក្សាថ្នាក់ "អនុបណ្ឌិតខាងព្យាបាលសុខភាពផ្លូវចិត្ត" ។ ធ្វើការយកកំរៃតាមពេលមកធ្វើការក៏បាន ឬពេញម៉ោងក៏បាន ។ ធ្វើការនៅតំបន់ ឡូហ្គាន់ និងនៅហ្វីឡាដែលហៀវខាងត្បូងជាមួយនឹងអ្នកជំងឺ ដែលត្រូវការព្យាបាលខាងជំងឺផ្លូវចិត្ត ។

**សូមផ្ញើប្រវត្តិរូបតាមលិខិតឆ្លងតាមនៅ :**

LORI WATSON @1939 SOUTH JUNIPER STREET
PHILADELPHIA, PA 19148

The Wedge Medical Center is seeking the Cambodian-speaking Master's Level Mental Health Therapists for the Logan and South Philadelphia Sites to provide Outpatient Mental Health Therapy (Fee-For-Service or Full Time). All Interested Candidates should 'regular mail' their resumes to LORI WATSON @ 1939 South Juniper Street, Philadelphia, PA 19148.

---

# គណបក្សសិទ្ធិមនុស្ស

បំរើ-ការពារ-កសាង

## HUMAN RIGHTS PARTY

## ដឹកនាំដោយឯកឧត្តម កឹម សុខា

សូមអញ្ជើញលោក.លោកស្រីមើលក្នុងគេហទំព័រ www.HRPCambodia.info ដើម្បីស្តាប់វិទ្យុ និងតាមដានព័ត៌មានទាន់សភាពការណ៍ ទាក់ទងនឹងប្រទេសកម្ពុជា ។
បើអស់លោកចង់ចូលរួម សូមទាក់ទងមក

លោក ញ៉ាយ ចំរើន ទូរស័ព្ទ :
267-226-7861 អ៊ីម៉ែល : chamroeunkh@yahoo.com

# តមកពីទំព័រទី០១ សន្និសីទពិភពលោកលើកទី៣...

នៃទីក្រុងហ្វីឡាដែលហ្វីយ៉ា នាព្រឹកថ្ងៃសៅរ៍ ទី២៣ ឧសភានេះ មានកម្មវិធីរបស់ "សហព័ន្ធខ្មែរក្រោម" បានត្រូវផ្សព្វផ្សាយអញ្ជើញសាធារណជនឱ្យចូលរួម ។ សហគមន៍ខ្មែរក្រោម នាថ្ងៃនោះ នាំគ្នារៀបចំ "សន្និសិទពិភពលោកលើកទី៣ របស់យុទ្ធជនខ្មែរក្រោម" ក្នុងបរិវេណមណ្ឌលទេសចរសាធារណដ៏សំខាន់ជាងបំផុត មួយក្នុងទីក្រុងហ្វីឡាដែលហ្វីយ៉ា ដែលឥឡូវនេះកំពុងត្រូវគេកត់សំគាល់ថា ជាទីក្រុងដ៏ស្វាហាប់មួយក្នុងសកម្មភាពសំដៅទៅប្រទេសកម្ពុជា និងកម្ពុជាក្រោម ។

ក្រោមសញ្ញានៃសម្ព័ន្ធភាពជាមួយប្រជាជនពិភពលោក ដែលស្រឡាញ់សេរីភាព និងការគោរពសិទ្ធិមនុស្ស "សហព័ន្ធខ្មែរក្រោម" បានបង្ហាញនៅពេលសន្និសិទនោះ នូវរូបភាពកែទម្រង់ជាច្រើន ដែលមុខមាត់សហព័ន្ធឆ្នាំ២០០៩ជារចនាសម្ព័ន្ធសម័យចេះប្រើប្រព័ន្ធសាធារណទំនើប ចេះប្រើទស្សនៈនៃសង្គ្រាមត្រជាក់ ដើម្បីធ្វើឱ្យសម្រេចនូវវត្ថុបំណងរបស់ខ្លួនយ៉ាងមានប្រសិទ្ធភាព ៕

សូមអានអត្ថបទខ្មែរក្រោមផ្សេងទៀតនៅទំព័រក្នុង

